# ខ្មែរប៉ុស្តិ៍

THE KHMER POST

ISSUE 47 November 13th - 26th 2009



សូមអញ្ជើញលោកអ្នកអានអត្ថបទជាភាសាអង់គ្លេស នៅទំព័រខាងក្នុង ដែលបានដកស្រង់ចេញពីសារព័ត៌មាន The Cambodia Daily នៅប្រទេសកម្ពុជា ។

# ខ្មែរក្រៅប្រទេសចូលរួមក្នុងកម្មវិធី “អង្គប្រជុំជំរះវិសាមញ្ញក្នុងតុលាការកម្ពុជា”

Presented by : ASRIC and AP A Institute at New York University ,
In cooperation with :
The Khmer Post - East Coast
The Cambodian Association of Greater Philadelphia Mental Health Association of Southeastern Pennsylvania
នាចន្លោះឆ្នាំ ១៩៧៥-៧៩ **តទៅទំព័រទី ០៩**

## បុណ្យអុំទូក៣ថ្ងៃ នៅកម្ពុជា

**ភ្នំពេញ** : អនុប្រធានអចិន្ត្រៃយ៍ និងជាអគ្គលេខាធិការគណៈកម្មការរៀបចំបុណ្យជាតិ និងស្នងការនគរបាលរាជធានីភ្នំពេញ បានអះអាងថា ព្រះរាជពិធីបុណ្យអុំទូក បណ្តែតប្រទីប អកអំបុក សំពះព្រះខែ រយៈពេល៣ថ្ងៃ បានប្រព្រឹត្តទៅយ៉ាងរលូនដោយមានការចូលរួមពីប្រជាពលរដ្ឋមកពី

**តទៅទំព័រទី ១៤**

## គាំទ្រពីរ ជាប់ឆ្នោតទាំងពីរ

**ខ្មែរប៉ុស្តិ៍ :** ថ្ងៃអង្គារ ទី៣ ខែវិច្ឆិកា កន្លងទៅនេះ មានការបោះឆ្នោតជ្រើសរើសតំណាងរាស្ត្រ ឬរដ្ឋបាលថ្មីផ្សេងៗជាច្រើន ដែលអាណត្តិត្រូវបញ្ចប់ ។ សហគមន៍ខ្មែរមានទម្លាប់ដាក់ខ្លួន មិនសូវចូលរួមក្នុងសកម្មភាព ដែលគេយល់ឃើញថានេះជា **តទៅទំព័រទី ១៧**

អាយដា ឆិន

# ប្រើគ្រប់មធ្យោបាយ ដើម្បីយុវជនខ្មែរ

**វៀរស៊ីនៀ** : រាត្រីសមោសរមួយរៀបចំឡើងដោយ "មូលនិធិសម្រាប់ការសិក្សា" កាលពីថ្ងៃទី ៣១ តុលា នៅវៀរស៊ីនៀ ប្រមូលមូលថវិកាបាន ៧ ពាន់ដុល្លារ សម្រាប់ជួយដល់យុវបនិស្សិតខ្មែរក្រីក្រឱ្យអាចបន្តការសិក្សាទៅឆ្ងាយបាន ។

លោកវេជ្ជបណ្ឌិត ខ្ចៅ សំរ៉ង ជាប្រធានបានខំប្រឹងរហូតដល់រហូតខោរបូតអាវប្រមូលទ័ពខ្មៅឆៅទ័ពទេព-អប្សរ មេអំបៅចម្រុះពណ៌ឱ្យមកជួយរកថវិកា ដែលកំពុងតែក្រខ្សត់នៅសហរដ្ឋអាមេរិកនេះ ពេញអស់មួយរាត្រី "ហាឡូវីន" នោះ ៕







# ចំណាប់អារម្មណ៍ទៅលើបញ្ហារបបខ្មែរក្រហម



**មតិលោក ម៉ម យីន :**

▶ ពាក្យពីរម៉ាត់ ដែលលោកកាល់ម៉ាក់ បានបង្កើតឡើងមុន គេបង្អស់នៅក្នុងទសវត្សទី១៨ មានអត្ថន័យ និងខ្លឹមសារល្អណាស់ គឺជាទ្រឹស្តីកុម្មុយនីស្តនិយម ហើយកែសម្រួលទៅលើរបបគ្រប់គ្រងមួយទៀត ដែលមានឈ្មោះថា មូលធននិយម (Capitalism) ដែលគេចាត់ទុកថា ជារបបគិតតែស្វែងរកផលប្រយោជន៍ផ្ទាល់ខ្លួន ដោយប្រើអំណាចសង្កត់សង្កិនទៅលើពលកម្មនៃប្រជាពលរដ្ឋក្រីក្រ វណ្ណៈអធន បានត្រឹមតែធ្វើទាសកររបស់ក្រុមមូលធននិយមទាំងនោះ ។

ទ្រឹស្តីរបបសង្គមនិយម ឬកុម្មុយនិស្តនិយម បានត្រូវមនុស្សជាច្រើនយកមកសិក្សា ហើយធ្វើការអនុវត្តន៍ទៅតាមទ្រឹស្តីនោះ ដូចជាលោកឡេនីន បានធ្វើពិសោធន៍កម្មនៅក្នុងការអនុវត្តន៍ជាក់ស្តែងនៅក្នុងចំណុចខ្លះៗនៃទ្រឹស្តីបានឃើញថា មានប្រសិទ្ធិផលជាក់ស្តែងពិតប្រាកដមែន ។

លុះមកដល់សម័យលោក ស្តាលីន ១៩៤១-១៩៥៣ ពេលនោះ បានចាប់ផ្តើមអនុវត្តន៍ទ្រឹស្តីកាល់ម៉ាក់ ម៉ាក់ឡេនីន យ៉ាងពេញទំហឹង ដើម្បីបង្ហាញឱ្យឃើញភាពជាក់ស្តែង ម្ល៉ោះហើយនៅពេលនោះ គេសង្កេតឃើញរបបសង្គមនិយម ឬកុម្មុយនីស្ត បានសម្លាប់ជនជាតិរូស្ស៊ីអស់ជាច្រើនសិបលាននាក់ ដោយសារតែមនុស្សទាំងនោះ ពុំព្រមអនុវត្តន៍ធ្វើតាមទ្រឹស្តីនោះ ។ របបផ្តាច់ការ (Dictatorship or Ditatorism) អំណាចទាំងអស់បានប្រមូលផ្តុំមកលើតែមនុស្សម្នាក់នោះ ដែលជាអគ្គលេខាធិការបក្សកុម្មុយនីស្តជាអ្នកដឹកនាំទី១ ដែលបានបង្កើតសាធារណរដ្ឋសហភាពសង្គមនិយមសូវៀត (United Socialist Soviet Repuplic) USSR ឡើង ដោយតំកល់ទុក ថាជារបបស្តាលីននិយម (Stalirism) នាសម័យនោះ ។

ទ្រឹស្តីកុម្មុយនីស្តនិយម ឬសង្គមនិយមនេះ បានរីកសាយភាយទៅដល់មេដឹកនាំប្រទេសជាច្រើននៅក្នុងពិភពលោក ដូចជា ប្រទេសចិន និងប្រទេសមួយចំនួននៅអាស៊ី ប្រទេសមួយចំនួននៅអឺរ៉ុបជាដើម រហូតមកដល់ប្រទេសកម្ពុជា ដែលបានទទួលមនោគមវិជ្ជាកុម្មុយនីស្តនេះដែរ ។ តាមរយៈក្រុមខ្មែរក្រហមយៀកមិញ បង្កើតឡើងដោយលោក ហូជីមិញ យួន ហាណូយ គឺជាសមាជិកបក្សកុម្មុយនីស្តអន្តរជាតិ ដែលគេឱ្យឈ្មោះមុនដំបូងថា "បក្សប្រជាជនបដិវត្តន៍កម្ពុជា" កាលពីឆ្នាំ១៩៥១ បានខិតខំព្យាយាមពង្រីង និងពង្រីកឥទ្ធិពលរបស់ខ្លួនយ៉ាងសកម្ម និងស្វិតស្វាញ ជាទីបំផុត ទោះបីជានៅពេលនោះប្រជាពលរដ្ឋខ្មែរដែលស្រឡាញ់លទ្ធិប្រជាធិបតេយ្យបានបង្កើតគណបក្សប្រជាធិបតេយ្យ តាំងពីអំឡុងឆ្នាំ ១៩៤៦ ដើម្បីប្រឆាំងទប់ទល់នឹងអ្នកកាន់អំណាចផ្តាច់ការក៏ដោយ ក៏ក្រុមមេដឹកនាំខ្មែរក្រហមនេះ ប្រើអំណាចផ្តាច់ការយកកម្លាំងប្រដាប់អាវុធសម្លាប់ជីវិតប្រជាពលរដ្ឋខ្មែរអស់ប្រមាណជិតបួនលាននាក់ ដែលបង្ហាញឱ្យឃើញយ៉ាងជាក់ស្តែងថា ក្រុមពួកកុម្មុយនីស្ត ឬខ្មែរក្រហមយៀកមិញនេះ ពុំមានជាក្រុមមានឧត្តមគតិស្នេហាជាតិខ្មែរនិយម (Patriotic Nationalism) ពិតប្រាកដទេ គឺពិតជាក្រុមបំរើដាច់ថ្លៃរបស់មេក្លោងកុម្មុយនីស្តសង្គមនិយមយួនសុទ្ធសាត ដូចមានគម្រោងរាប់រយឆ្នាំរបស់លោកហូជីមិញ បានជោគជ័យពេញបរិបូរ តាំងពីឆ្នាំ ១៩៧៥ ឱ្យបានសម្រេចទៅតាមផែនការបង្កើនសហព័ន្ធឥណ្ឌូចិន (Indochinese Federation) ដែលមានប្រទេសយួនវៀតណាមជាមេដឹកនាំ ។

**១-អំណាចផ្តាច់ការខ្មែរក្រហមកម្ពុជាប្រជាធិបតេយ្យ ១៩៧៥-៧៩**

ក្នុងរយៈកាលឆ្នាំ១៩៧៥ បង្ហូរឈាមមកដល់គឺជាសម័យមាតាបីតាក្រុមខ្មែរយៀកមិញ ឱ្យចូលមកសម្លាប់ជនជាតិខ្មែរគ្រប់មធ្យោបាយ និងរូបភាពដោយផ្ទាល់ និងដោយប្រយោល ។ ក្រុមខ្មែរយៀកមិញបានសម្លាប់ខ្មែរទាំងជីវិតទាំងព្រលឹងវិញ្ញាណឱ្យបាត់សូន្យសុង ចំណែកខ្មែរនៅរស់វាសម្លាប់សតិស្មារតីឧត្តមគតិជាតិនិយម និងព្រលឹងវិញ្ញាណឱ្យធ្លាក់ចុះទន់ខ្សោយដល់កំរិតមួយប្រៀបបានដូចជាមនុស្សវិកលចរិត ។ អ្នកនៅរស់នេះទៀតសោត គឺជាមនុស្សខ្វះខាតខាងចំណេះវិជ្ជាជ្រៅជ្រះ ពីព្រោះអ្នកចេះដឹងខ្ពស់ និងមធ្យមត្រូវបានសម្លាប់ចោលអស់ទៅហើយស្ទើរគ្មានសល់ ។

ការប្រើវិធីសម្លាប់នោះ មានសភាពកាចសាហាវព្រៃផ្សៃខ្លាំងណាស់ សូម្បីតែកុនសំដែងរឿងវាលពិឃាដ (Killing Field) នោះ ពុំមែនបញ្ជាក់បង្ហាញរូបភាពអំពីទម្ងន់អំពើកាចសាហាវព្រៃផ្សៃកាប់សម្លាប់បានគ្រប់១០០ភាគរយនោះទេ គឺគ្រាន់តែជាគំរូមួយបង្ហាញបានប្រមាណ៥០ភាគរយតែប៉ុណ្ណោះ នៅក្នុងរយៈពេលបួនឆ្នាំគ្រប់គ្រងរបស់ខ្មែរក្រហមធ្វើបានដោយផ្ទាល់នោះ ។

ការធ្វើទារុណកម្មយ៉ាងសាហាវព្រៃផ្សៃនេះ បានបង្កើតទៅជាមហាសោគនាកម្មមួយទៅទាក់ទាញកន្ត្រាក់អារម្មណ៍ប្រជាពលលោកទាំងមូលឱ្យមានចេតនាចង់ស្វែងរកឱ្យបានឃើញរឿងប្រាកដថា តើមានមូលហេតុអ្វីដែលបណ្តាលឱ្យក្រុមពួកខ្មែរក្រហមយៀកមិញនេះ សម្លាប់ជីវិតជនជាតិខ្មែរឱ្យស្លាប់យ៉ាងរង្គាលដូច្នេះ ។

ក្នុងការស្វែងរកការពិត តើតុលាការពិសេសសម្រាប់កាត់ទោសមហាឧក្រិដ្ឋកម្មមេដឹកនាំខ្មែរក្រហមកំពុងបើកសាវនាការកាត់ក្តីនោះ បានធ្វើដល់កំរិតណា ? **តទៅទំព័រទី ១៤**




## The Khmer Post Directory

**East Coast Publication**

Regional Editor : Pin Samkhon
Email : pinsamkhon@gmail.com
Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum

**Advertising**
**Marketing Manager:**
**Sabane Thach**
**Phone : 267-253-3947**
**Email : sabane.thach@gmail.com**

**West Coast Publication**

RegionalEditor : Sovannara Meach
**Phone: (562) 313-2129**
**Email: sovannara04@yahoo.com**


## មាតិការឿង

# តំណាងរាស្ត្រខ្មែរ ហូ វ៉ាន់ នៅហ្វីឡាដែលហ្វៀ

**ខ្មែរប៉ុស្តិ៍ :** លោក ហូ វ៉ាន់ តំណាងរាស្ត្រខ្មែរ ខាងគណបក្ស សម រង្ស៊ី បានអញ្ជើញមកជួបសហគមន៍ខ្មែរនៅហ្វីឡាដែលហ្វៀ នាថ្ងៃអាទិត្យ ទី ២៩ តុលា នៅភោជនីយដ្ឋានមួយនាខាងត្បូងទីក្រុង ។

ថ្លែងទៅកាន់ភ្ញៀវដែលអញ្ជើញមកចូលរួម លោក ហូ វ៉ាន់ បានថ្លែងពីសកម្មភាពដ៏លំបាករបស់



គណបក្សប្រឆាំងនៅកម្ពុជា ក្នុងបំរើភារកិច្ចលោកជាអ្នកធ្វើច្បាប់ ពីព្រោះមានច្បាប់មួយចំនួននោះ គេអនុម័តក្រោយពីច្បាប់បានត្រូវប្រើរួចជាស្រេចទៅហើយ ។ លោកថា "ស្ថាប័នបីនៅកម្ពុជាមានតុលាការ-រដ្ឋាភិបាល និងសភាជាតិ ពុំមានភាពឯករាជ្យទេ ហើយគ្មានសមាជិកតំណាងរាស្ត្របក្សប្រឆាំងណាមួយនៅក្នុងគណកម្មការសភាជាតិនោះទេ ។

សំនួរជាច្រើនចំពោះលោក ហូ វ៉ាន់ ទាក់ទងទៅនឹងឥរិយាបថរបស់គណបក្ស សម រង្ស៊ី ចំពោះសម្ព័ន្ធភាពនៃគណបក្សប្រឆាំង ជាពិសេសជាមួយគណបក្សសិទ្ធិមនុស្ស ដែលមានលោក កឹម សុខា ជាប្រធាន លោកតំណាងរាស្ត្របានបង្ហាញថា គណបក្សលោកមានបំណងយ៉ាងជាក់ច្បាស់ចង់ភ្ជាប់កម្លាំងជាមួយគណបក្សសិទ្ធិមនុស្សតែការប្តូរឈ្មោះគណបក្សទៅជាអ្វីផ្សេងនាពេលនេះ គឺជាការគ្រោះថ្នាក់មួយ លោកស្រីតំណាងរាស្ត្រ មូ សុខហួរ បានត្រូវចាត់តាំងឱ្យជាអ្នកពិគ្រោះសម្រាប់ធ្វើឱ្យសម្ព័ន្ធភាពនោះកើតឡើងនៅជុំវិញបង្គោលមួយដ៏រឹងមាំដែលប្រជាពលរដ្ឋអាចនឹងសង្ឃឹមបាន ។

ឆ្លើយនឹងសំនួរដែលថា "គណបក្សប្រឆាំងមាន ២៦ រូប ដ៏តូចប្រឈមមុខនឹងសម្លេង ៩០ រូប របស់គណបក្សប្រជាជន តើចេះតែនាំគ្នារត់រហូតទៅឬយ៉ាងណា?" លោកឆ្លើយថា គណបក្សប្រជាជនដែលឈ្នះបាន ៩០ កៅអីនោះមានអ្នកបោះឆ្នោតឱ្យប្រមាណ ៣ លាននាក់ប៉ុណ្ណោះ រីឯគណបក្ស សម រង្ស៊ី មានសម្លេងដល់ទៅ១លានកន្លះទៅហើយ ចំណែកអ្នកដែលឥតបានបោះឆ្នោតមានជាង ២ លាននាក់ ដោយពុំគិតការពុករលួយរបស់គណកម្មការរៀបចំការបោះឆ្នោត គ.ជ.ប ដែលប្តូរមណ្ឌលបោះឆ្នោតដោយមិនប្រាប់មុន ដែលលុបឈ្មោះមនុស្សរាប់ម៉ឺននាក់ចេញពីបញ្ជីបោះឆ្នោតឱ្យតែដឹងថា មកពីគណបក្សប្រឆាំង ដែលមិនធ្វើលិខិតឱ្យប្រជាពលរដ្ឋ ដែលមិនច្បាស់លាស់ចំពោះបក្សប្រជាជនមិនឱ្យទៅបោះឆ្នោតបាន ...។ ដូច្នេះហើយ បើការបោះឆ្នោតមានភាពសុចរិត យុត្តិធម៌ គណបក្សប្រឆាំងអាចមានសំណាងនឹងឈ្នះឆ្នោតច្រើន ។

សំនួររបស់លោក អ៊ុម លឿម ស្តីពីលេចឮដំណឹងថា "គណបក្ស សម រង្ស៊ី មានតំនាបពីគណបក្សប្រជាជន ដោយមានទទួលលុយពីគេ? " ហើយឮថាអ្នកទទួលគឺ អេង ឆាយអៀង ទទួលតាមរយៈពាណិជ្ជករ គិត ម៉េង តើរឿងទាំងនោះមានការពិតឬទេ ? "។ ចម្លើយលោក ហូ វ៉ាន់ មកជាចម្ងល់ថា ទំនងជាមានទាក់ទងដំណឹងពីអតីតកាលខ្លះមែន តែហេតុអ្វីក៏ គិត ម៉េង មិនទៅរកលោក រង្ស៊ី ម្តេចក៏ឱ្យទៅ អេង ឆាយអៀង ទៅវិញ -អេង ឆាយអៀង ពេលនេះ ពុំមានតួនាទីអ្វីសំខាន់ទេ ហើយក៏ពុំឃើញមានជីវភាពធូធារអ្វីទេ - ពាក្យចរចាអារាមនេះ ពុំអាចជឿបានទេ ។

ទាក់ទងទៅនឹងអភ័យឯកសិទ្ធរបស់លោក ហូ វ៉ាន់ និយាយ " គេដកអភ័យឯកសិទ្ធ ពីព្រោះខ្ញុំបាននិយាយថា ការឱ្យសញ្ញាប័ត្របណ្ឌិតទៅមេទ័ពនោះពុំមានតម្លៃទេ " ដោយសារប្រយោជន៍នេះ វាប៉ះពាល់ដល់យៀកណាម ដែលជាអ្នកផ្តល់សញ្ញាប័ត្រ ទើបគេដកអភ័យឯកសិទ្ធខ្ញុំ ហើយឱ្យតុលាការកាត់ទោសកំបាំងមុខ ។ ចុងក្រោយនេះ ខ្ញុំបានធ្វើសេចក្តីថ្លែងការណ៍ ពន្យល់ពីប្រយោគរបស់ខ្ញុំដែលថា បាននិយាយពាក្យមិនពិត ករណីនេះ បានត្រូវរដ្ឋាភិបាលដកពាក្យបណ្តឹងចេញ ហើយនឹងទទួលបានអភ័យឯកសិទ្ធឡើងវិញជាស្ថាពរ នៅថ្ងៃទី ១០ ខែ ធ្នូ ខាងមុខ" ។ លោកបន្តថា "ចំណែកឯលោកស្រី មូរ សុខហួរ ពុំទាន់បានអភ័យឯកសិទ្ធនៅឡើយទេ ពីព្រោះនៅបន្តក្តីក្តាំទៅសាលាឧទ្ធរណ៍នៅឡើយ ហើយរឿងនោះ អាចបន្តទៅតុលាការកំពូលថែមទៀត "។

លោក មាស ជា ប្រធានសាខាបក្ស សម រង្ស៊ី នៅហ្វីឡាដែលហ្វៀ បានបញ្ចប់ថា បងប្អូនខ្មែរនៅក្រៅប្រទេសទាំងអស់ដែលបានធ្វើសកម្មភាពតវ៉ា រហូតដល់ជួយឱ្យមានការផ្តល់អភ័យឯកសិទ្ធដល់តំណាងរាស្ត្រខ្មែរ ឱ្យអាចធ្វើការជាធម្មតាវិញបាន ៕

**ខ្មែរប៉ុស្តិ៍**



(តមកពីទំព័រទី ១២) **ឆ្លងកាត់ក្រុងខ្មែរ... កុំភ្លេចទៅញ៉ាំ...**

ក្នុងខណៈដែលអ្នកជំនួញខ្មែរភាគច្រើនកំពុងបើកមុខរបរផ្នែកហាង Donut និងហាង Chinese Food ជាមុខរបរតំណរតគ្នាមកនោះ ។

ក្លិនន៏ PIZZA បានជះចេញមកដោយធ្វើឱ្យអារម្មណ៍យើងទទួលនូវភាពឈ្ងុយឆ្ងាញ់ មិនអាចទប់បានក្នុងការចង់ភ្លក់រសជាតិនៃម្ហូបរបស់ជនជាតិអ៊ីតាលីមួយនេះ ក្នុងខណៈដែលយើងបានដើរកាត់ហាងឬឈរនៅពីមុខទ្វារដែលបើកចំហរនៃហាងលក់ PIZZA ឈ្មោះ ROMA ។ នេះ ជាហាងលក់នំ PIZZA លើកទី1ដែលម្ចាស់ជាខ្មែរបើកលក់ដំបូងគេនៅក្នុងទីក្រុ ង ខ្មែរ Long Beach ។

ពូមី និងអ្នកស្រី សុីសាន ក្នុងសកម្មភាពផលិតនំ PIZZA (រូបថតខ្មែរប៉ុស្តិ៍)

ថៅកែឈ្មោះ មួន វាសនា បានអះអាងថា គាត់បានបើកហាងនេះមកមានរយៈពេល៤ខែ ហើយនៅក្នុងបរិវេណអគារ Phnom Pich Plaza នៃកាច់ជ្រុងផ្លូវ Anaheim និង Martin Luther King ។ ដែលការបើកមុខរបរលក់ PIZZA នេះ ក៏ព្រោះចង់ប្តូរអាជីពថ្មីដែលខ្មែរយើងមានពីមុនមកគ្មានអ្វីក្រៅពីហាង ដូណាត់ ឬហាង Chinese Food ។ ដូច្នេះរូបគាត់ចង់បង្កើតហាងលក់ PIZZA ដែលជាម្ហូបកំពុងពេញនិយមរបស់ជនជាតិអ៊ីតាលីដែលមានខ្មែរជាម្ចាស់ និងចង់ឃើញខ្មែរឯទៀត នាំគ្នាបើកមុខរបរបែបនេះជាលក្ខណៈ Fran-chise ឱ្យបានច្រើនជាមួយគ្នា ។

មួន វាសនា និយាយថា "ខ្ញុំចង់ឃើញការរកស៊ីរីកចម្រើនក្នុងសហគមន៍ខ្មែរដែលមានមុខរបរផ្សេងៗគ្នា ឬដូចគ្នាតែរួមសហការគ្នា" ។

ថៅកែ មួន វាសនា បានប្រាប់ថា សព្វថ្ងៃគាត់ផលិត PIZZA **តទៅទំព័រទី ០៩**




# គណៈកម្មាធិការព្រំដែនកម្ពុជា

CFC-CBC 0701/24K

*••• កាលពី៨ឆ្នាំមុន រដ្ឋាភិបាលកម្ពុជា ដឹកនាំដោយ លោក ហ៊ុន សែន និងរដ្ឋាភិបាលថៃ ដឹកនាំដោយ ថាក់ស៊ីន ស៊ីណាវ៉ាត់ បានចុះហត្ថលេខាលើ "អនុស្សរណៈនៃការយោគយល់គ្នា" មួយស្តីពីសកម្មភាពជីកយកប្រេងរួមនៅឈូងសមុទ្រសៀម ដោយចែកប្រាក់ចំណូលស្មើគ្នា ឥឡូវនេះ រដ្ឋាភិបាលថ្មី បានបង្ហាញឆន្ទះចង់លប់អនុស្សារណៈនោះចោលចេញ ។ គណកម្មការព្រំដែនកម្ពុជា នៅទីក្រុងប៉ារីស ដឹកនាំដោយលោក ស៊ាន ប៉េងសែ ដែលជាអង្គការឯករាជ្យមួយតាមដានយ៉ាងជិតស្និតពីបញ្ហាព្រំដែនទឹក និងគោក បានសរសេរលិខិតទៅលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ផ្តល់នូវយោបល់ និងបច្ចេទេស ដើម្បីឱ្យកម្ពុជាអាចមានឱកាសដកខ្លួនពីគំនាបបរទេសជិតខាងបាន ។ សូមអញ្ជើញអានលិខិតនោះទាំងស្រុងដូចតទៅ :*

**ទីក្រុងប៉ារីស ថ្ងៃទី ១៨ កក្កដា ២០០១**

**សូមជំរាបមក សម្តេច ហ៊ុន សែន នាយករដ្ឋមន្ត្រី នៃរាជរដ្ឋាភិបាលកម្ពុជា ក្រុងភ្នំពេញ សូមជ្រាប ។**

**កម្មវត្ថុ** : កិច្ចព្រមព្រៀងខ្មែរ-ថៃ ស្តីពីសកម្មភាពផលិតកម្មប្រេងកាតរួមគ្នា ។

សម្តេចតាងនាមរាជរដ្ឋាភិបាលកម្ពុជា សម្តេចបានចុះហត្ថលេខា នាថ្ងៃទី ១៨ មិថុនា ២០០១ ជាមួយនាយករដ្ឋមន្ត្រីថៃ នូវសេចក្តីថ្លែងការណ៍បញ្ជាក់អំពីសេចក្តីនានាក្នុង "អនុស្សារណៈនៃការយោគយលគ្នា" មួយ ស្តីពីសកម្មភាពផលិតកម្មរួមគ្នា ក្នុងតំបន់ប្រេងកាតពីរតំបន់នៅក្នុងឈូងសមុទ្រសៀម ។ សារព័ត៌មាន "កំបូតស្វ័ស្វារ" (Cambodge Soir) ចេញថ្ងៃ១៨/០៦/២០០១ ដែលផ្សាយអំពីព្រឹត្តការណ៍នេះ បានឱ្យដឹងថា "អនុស្សារណៈនៃការយោគយល់គ្នា" បានគ្រោងថាកម្ពុជា និងថៃឡង់ និងចែកស្មើភាពគ្នានូវប្រាក់ចំណូល និងចំណេញលើផ្ទៃសមុទ្រទំហំ ២៧.០០០គម² ដែលនឹងត្រូវឱ្យធ្វើសកម្មភាពផលិតកម្មរួមគ្នា" ហើយ "តាម គោលការណ៍ប្រទេសទាំងពីរ នឹងរៀបចំជាមួយគ្នា ក្នុងរយៈប្រាំមួយខែបន្ទាប់នោះ នូវក្របខ័ណ្ឌច្បាប់ និងបច្ចេកទេស ព្រមទាំងអនុសញ្ញារួមគ្នា ដែលអនុស្សារណៈនោះ បានកំណត់ស្រាប់ហើយ" ។

ដោយហេតុព្រួយបារម្ភចំពោះផលវិបាកអាស្រូវ ដែលនឹងអាចកើតដល់អធិបតេយ្យភាពកម្ពុជា នៅអនាគតកាល គណៈកម្មាធិការព្រំដែនកម្ពុជា មានករណីកិច្ចសូមរំលឹកនូវជំរៅលិខិត ចុះថ្ងៃទី៦ ធ្នូ ១៩៩៩ ដែលយើងបានផ្ញើជូនសម្តេច និងមានទំនាក់ទំនងជាមួយ "អនុស្សារណៈនៃការយោគយល់គ្នា" នាថ្ងៃ ១៨ មិថុនា ២០០១ នេះដែរ ក្នុងចំណុចសំខាន់ៗខាងក្រោមនេះ :

**១-** ថ្វីត្បិតតែមានកិច្ចព្រមព្រៀងបារាំង-សៀម ចុះថ្ងៃ២៣ មិនា ១៩០៧ ហើយក្តីប្រទេសថៃឡង់ បានបើកសិទ្ធឯកតោភាគី ក្នុងទសវត្សរ៍ ១៩៦០ សំរេចកំណត់បន្ទាត់បរិវេណខ្ពង់រាបសមុទ្រខ្លួន ឱ្យកាន់តែងាកច្រើនឡើងៗ មកខាងឆ្នេរសមុទ្រខ្មែរ គឺគេពង្រីកតំបន់មានទំនាស់គ្នា រវាងប្រទេសទាំងពីរកាន់តែធំឡើងជាលំដាប់ ។


នាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន និងលោក ថាក់ស៊ីន


នាយករដ្ឋមន្ត្រីថៃ អភិស៊ីត វីចាជីវ៉ា

**២-** នៅឆ្នាំ១៩៩៥ រាជរដ្ឋាភិបាលកម្ពុជាធ្លាប់បានស្នើរម្តងហើយ ឱ្យបើកសកម្មភាពផលិតកម្មរួមគ្នា រុករកប្រេងកាតជាមួយសហគ្រាសបរទេស នៅក្នុងតំបន់នោះ តែត្រូវសហគ្រាសបរទេសទាំងនោះសំរេចដកទុនវិនិយោគខ្លួនវិញ ព្រោះតែបញ្ហាកំណត់ព្រំដែនក្នុងតំបន់មានទំនាស់នោះ មិនទាន់សំរេចជាក់ច្បាស់រវាងខ្មែរ និងថៃ ។ ពេលនោះសោត ប្រទេសថៃឡង់ខ្លួនឯង ក៏បានស្នើកម្ពុជា ឱ្យបើកកិច្ចចរចាគ្នា ដើម្បីកំណត់ជាក់ច្បាស់នូវដែនសមុទ្ររៀងខ្លួនដែរ ។

**៣-** នៅពេលនេះ ក្នុងតំបន់ផ្សេងៗ ដែលកំណត់ក្នុងអនុស្សារណៈ នៃការយោគយល់គ្នា នាថ្ងៃ១៨ មិថុនា ២០០១ មានតំបន់មួយស្ថិតទាំងស្រុងក្នុងបរិវេណខ្ពង់រាប់សមុទ្ររបស់កម្ពុជា ដែលកិច្ចព្រមព្រៀងបារាំង- សៀម ចុះថ្ងៃ២៣ មីនា ១៩០៧ បានកំណត់ច្បាស់ គឺមិនមែនជាតំបន់វ៉ាតលើដែនសង្វាងទេ ។

**៤-** តាមធម្មតា សកម្មភាពផលិតកម្មរួមគ្នានឹងប្រព្រឹត្តត្រឹមត្រូវបាន លុះណាគេបានកំណត់ជាក់ច្បាស់ជាស្រេចហើយ នូវព្រំដែននៃតំបន់មានទំនាស់ផង ហើយធ្វើផលិតកម្ម តែត្រង់តំបន់ដែលមានប្រេងកាត ចំខ្សែព្រំដែនដែលគេកំណត់ហើយនោះផង ។ ក្នុងករណីខាងក្រោមនេះ ការចែកប្រយោជន៍គ្នាតែងធ្វើតាមសមាមាត្រ (prorata) នៃផ្ទៃតំបន់ដែលមានប្រេងកាត ឬតាមភាគទំហំនៃស្តុកប្រេងដែលការរុករកបានឃើញត្រង់ទីនោះ គឺមិនមែនចែក "ស្មើភាពគ្នា" នៅគ្រប់កន្លែងដូចអនុស្សារណៈនៃការយោគយល់គ្នានោះបានបន្ទឹទេ ។

**៥-** ក្នុងកាលកន្លងមកនេះ ប្រទេសថៃឡង់ និងប្រទេសម៉ាឡេស៊ីមានទំនាស់ជាយូរអង្វែងណាស់ ក្នុងរឿងកំណត់ព្រំដែនខ្ពង់រាបសមុទ្ររៀងខ្លួន ។ ប្រទេសទាំងពីរបានរក្សាកិត្តិយសជាតិគេ ដោយធ្វើកិច្ចចរចាគ្នាយ៉ាងល្អិតល្អន់អស់រយៈច្រើនទសវត្សរ៍ទំរាំបានសំរេចកិច្ចព្រមព្រៀងបញ្ចប់មួយនៅឆ្នាំ១៩៩៤ មុននឹងគេសុខចិត្តដាក់តំបន់តូចមួយមានផ្ទៃបួន-ដប់គម² ឱ្យធ្វើផលិតកម្មរួមគ្នា (Joint development areas) នៅឆ្នាំ ១៩៩៥ ប៉ុណ្ណោះ ។

ប្រទេសកម្ពុជាយើង សព្វថ្ងៃកំពុងស្ថិតក្នុងរយៈកាលមួយប្រកបដោយគ្រោះថ្នាក់ណាស់ ចំពោះរូបភាពទឹកដីខ្លួន និងអធិបតេយ្យជាតិដរាបណាសន្ធិសញ្ញា និងកិច្ចព្រមព្រៀងនានា ដែលបានចុះហត្ថលេខាជាមួយវៀ តណាម ក្រោមអំណាចយោធាកាន់កាប់របស់វៀតណាម ពុំទាន់ត្រូវបានលប់ចោលដោយអនុវត្តន៍តាមកិច្ចព្រមព្រៀងក្រុងប៉ារីស ឆ្នាំ ១៩៩១ ព្រមគ្នា និងប្រកាសជាឱឡារិក ដោយរាជរដ្ឋាភិបាលកម្ពុជា មិនទទួលស្គាល់សន្ធិសញ្ញាទ្វេភាគីរវាងថៃឡង់ និងវៀតណាម ចុះថ្ងៃ១១ សីហា ១៩៩៧ ដែលធ្វើបំពានលើកម្ពុជានោះទេ ។ នៅពេលនោះទៀត ការយល់ព្រមរបស់កម្ពុជា ចំពោះ "សកម្មភាពផលិតកម្មរួមគ្នា" ជាមួយថៃឡង់ ក្នុងលក្ខខ័ណ្ឌមិនជាក់ច្បាស់ហ្នឹងនឹងអាចបានជាលេសក្នុងអនាគតកាល ឱ្យថៃឡង់លើកសំអាងថាជាការទទួលស្គាល់របស់ខ្មែរនូវដែនសមុទ្រមួយ "មានទំនាស់" ដែលតំរូវឱ្យមានការគូសបន្ទាត់ព្រំដែនថ្មី ទោះបីមានបន្ទាត់ដែលកំណត់រួចហើយដោយកិច្ចព្រមព្រៀងអន្តរជាតិនានាក្នុងអតីតកាលក្តី ។

អាស្រ័យហេតុនេះ យើងខ្ញុំយល់ថា កម្ពុជាមិនត្រូវធ្វើសកម្មភាពផលិតកម្មរួមគ្នាអ្វីក្នុងតំបន់ផ្សេងៗនៃដែនសមុទ្រខ្លួន ជាមួយវៀតណាមក្តី ជាមួយថៃឡង់ក្តី ដរាបណារាល់បញ្ហាខាងលើមិនទាន់បានសំរេចជាក់ច្បាស់ តាមក្បួនខ្នាតច្បាប់ ដែលបានអនុភាពអន្តរជាតិ និងក្នុងការគោរពអធិបតេយ្យ បូរណភាពទឹកដី និងប្រយោជន៍ត្រឹមត្រូវរៀងខ្លួន រវាងកម្ពុជា និងប្រទេសជិតខាងនោះ ឡើយ ។

ដោយមានជំនឿថា សម្តេចនាយករដ្ឋមន្ត្រី នឹងចាប់អារម្មណ៍ចំពោះសង្កេតនានាខាងលើ យើងខ្ញុំសូមសម្តេចមេត្តាទទួលជាមួយនេះ នូវភាពវភក្តីដ៏ខ្ពង់ខ្ពស់អំពីយើងខ្ញុំ ៕




ប្រធានគណៈកម្មាធិការព្រំដែនកម្ពុជា

*ស៊ាន ប៉េងសែ*




**ដោយ : គឹម ភឿន** ***(តពីលេខមុន)***

ប្អូនឯងដឹងស្រាប់ហើយ ពួកបងមានចំណេះដឹងទូទៅត្រឹមឌីប្លូមទេ កាលពួកបងស្ម័គ្រចិត្តចូលរៀនសាលាកងទ័ព។ លោកឧត្ដមសេនីយ៍ លន់ នល់ បានពួកឯងស្ម័គ្រចិត្តចូលបំរើកងទ័ព ជាសំណាងរបស់លោកមួយហើយ ។ សម្ងំស្ងៀមមួយសន្ទុះលោកអ៊ុំ សារ៉ុណ សាកសួរពីពត៌មានរបស់អ្នកទោសខ្មែរក្រហមវ័យក្មេងនោះ :

- ប្អូនបានព័ត៌មានផ្ទាល់ខ្លួនពីអាខ្មែរក្រហមវ័យក្មេងនេះខ្លះនៅ ? វីរៈ ហាក់ដូចងឿងឆ្ងល់ចំពោះសំនួររបស់បងធមិខ្លួន តែមិនហ៊ានសួរទៅគាត់វិញទេ ហើយឆ្លើយសំនួររបស់គាត់ដោយទ្រង់រិះគិតបណ្ដើរ :" វាជាកូនសិស្សថ្នាក់ទីបញ្ចប់វិទ្យាល័យតាំងគោកនេះឯង ជាសិស្សពូកែទៀតផង ។" លោកអ៊ុំ សារ៉ុណ មានទឹកមុខមាំសម្លឹង វីរៈ "ប្អូនមានយោបល់យ៉ាងណាចំពោះអាក្មេងនោះ ?" គិតមួយសន្ទុះ វីរៈឆ្លើយមួយៗ :

-តាមគំនិតខ្ញុំគួរបងទាមទារយកមនុស្សទោសនេះទៅថ្នាក់លើដោះស្រាយយើងស្អប់ខ្មែរក្រហមឃោរឃៅ តែយើងធ្វើឃោរឃៅ ដូចខ្មែរក្រហមដែរ វាមានន័យអីទៀត? ។ លោកអ៊ុំ សារ៉ុណ ញញឹមទៅកាន់ វីរៈ ដោយពេញចិត្ត : " បងគាំទ្រយោបល់ឯង!" ។ ហាក់ដូចនឹកឃើញរឿងអីមួយលោកអ៊ុំ សារ៉ុណ បែរជាសួរបញ្ជាក់ប្អូនធមិរបស់ខ្លួនដោយរួសរាន់ :

-ពីដំបូងឯងសួរបងថា ខ្យល់ពីណាបានបក់ឱ្យបងមកដល់ទីនេះមែនទេ ? រវល់តែជួបឯងសប្បាយពេកភ្លេចឆ្លើយសំនួរឯង ! បងជាប់ប្រតិបត្តិការសិកនៅភ្នំសន្ទុក ស្រាប់តែមានសារពីឯកឧត្ដមប្រធានាធិបតីលោកឱ្យទៅជួបជាបន្ទាន់ បងក៏ត្រឡប់ទៅភ្នំពេញ តែមកដល់តាំងគោក គិតថាចូលលេងជាមួយអាសម្លាញ់ណៃខុន ក៏បានជួបគេចងមនុស្សទោសឱ្យពន្លាត់ស្បែកនេះ ក៏បានជួបអាប្អូនឯងចៃដន្យតែម្ដងទៅ ។

**(សូមរង់ចាំអានភាគបន្តនៅលេខក្រោយ)** ។

# ស្វែងរកការរំដោះតាមមាគ៌ារបស់ព្រះពុទ្ធ

***ដោយ : សុបិន*** (ភាគ៣)



***ពិតិចសាស់ :*** ខ្ញុំបានទទួលម្ហូបមួយថ្ងៃបីដង ខុសពីអ្នកដទៃ ដោយសារខ្ញុំមានគភ៌ ដែលអាចហូបពេលព្រឹក, ពេលថ្ងៃ តែឥតហូបពេលល្ងាចទេ តែក៏មានទឹកតែ និងផ្លែឈើខ្លះសម្រាប់សិស្សថ្មី ដែលមិនធ្លាប់ឥតហូបបាយល្ងាចដែរ ។ នៅថ្ងៃទី៣ និងទី៤ នោះការពិនិត្យដង្ហើមនៅតែបន្ត ភាពស្ទះដង្ហើមរបស់ខ្ញុំ បានកើតឡើងច្រើនដង ហើយគ្រូបានផ្ដល់ឱវាទថា " ឱ្យអង្គុយបើកភ្នែក " ឱវាទនេះបានជួយឱ្យខ្ញុំអង្គុយបានច្រើន ដោយខ្ញុំអាចត្រឡប់មកពិនិត្យដង្ហើមបាន នៅពេលខ្ញុំបិទភ្នែកមកវិញ ភាពតានតឹងក៏ចុះបន្ថិចវិញដែរ... តែខ្ញុំសង្ស័យថា ដោយសារគភ៌ធ្វើឱ្យខ្ញុំឃ្លានចម្លែក ហើយប្រធានស្ត្រី បានបន្ថែមចំណីឱ្យខ្ញុំពេលល្ងាចថែមទៀត។

រៀងរាល់រាត្រី បន្ទាប់ពីអង្គុយរយៈពេល ១ម៉ោង គឺពីម៉ោង៧ដល់ម៉ោង៨ គឺការស្ដាប់ ការពន្យល់ព្រះ-ធមិ ពន្យល់ដោយលោកគ្រូ ហ្គោអិនកាផ្ទាល់ ដោយប្រើខ្សែអាត់វីដេអូ ដែលថតកាលពីឆ្នាំ ១៩៩១... ហើយរៀងរាល់រាត្រីនោះ គាត់រៀបរាប់ត្រូវគ្នានឹងអ្វីដែលកំពុងកើតក្នុងខ្លួន និងបទពិសោធន៍សិស្សសម្រាប់ថ្ងៃនោះគ្មានខុសគ្នា ។ ដោយសារលោកហ្គោអិនកា ជាពាណិជ្ជករថ្នាក់ខ្ពស់ រីឯគ្រូរបស់គាត់ក៏ជាមន្ត្រីកំពូលរបស់រដ្ឋាភិបាលភូមា ការពន្យល់ធមិរបស់ព្រះសមណគោត្តម តាមបែបលោកីយរបស់គាត់ធ្វើឱ្យខ្ញុំដែលទើបតែរៀនចប់មហាវិទ្យាល័យមនុស្សសាស្ត្រ និងសង្គមសាស្ត្រ ចាប់ចិត្តជាទីបំផុត ហើយចាប់ផ្ដើមប្រៀបធៀបការអនុវត្តន៍ព្រះធមិ ដែលខ្ញុំធ្លាប់អនុវត្តន៍ជាលក្ខណៈគ្រួសារ បានជាដំបូងបង្អស់ ។

ថ្ងៃទី ៥ បានមកដល់ ខ្ញុំមិននឹកស្មានសោះថា ខ្ញុំអាចអង្គុយបានយូរដល់ម្លឹង តែអារម្មណ៏របស់ខ្ញុំបែរជាយល់ថា ពេលវេលាបានវិលយ៉ាងឆាប់រហ័សជាទីបំផុតទៅវិញ... ការអង្គុយធ្វើត្រឹមតែពិនិត្យដង្ហើមសោះ ប្រែក្លាយទៅជាការងារដ៏ធំ ហើយសំខាន់ទៅវិញបាន ។ មកដល់ថ្ងៃទី៥នេះ ទើបវិប្បសនាចាប់ផ្ដើមពិតប្រាកដ... ថ្ងៃនោះខ្ញុំទើបបានដឹងថា ការដែលខ្ញុំប្រឹងពិនិត្យដង្ហើមនោះគឺដើម្បីបង្កើនគុណភាពរបស់អារម្មណ៍ខ្ញុំ ឱ្យឆាប់ដឹងទទួលនូវអ្វីៗ ដែលកើតឡើងក្នុងខ្លួនខ្ញុំ ។ គ្រូបានប្រាប់សិស្ស ថាអ្វីដែលចាប់លើស្បែកជីប១ សរសៃប្រសាទវាយលើស្បែក កំរើកបន្តបន្ទាប់ដូចជាស្រមោចវារ... ពេលខ្លះធ្វើឱ្យរមាស់ចង់តែអេះ... ពោះវៀនរមួលញ្ញក្រេតក្រេត ថ្ងៃនោះ នៅក្នុងសាលអង្គុយរួម គឺអង្គុយតជាប់២ម៉ោង ដោយឥតសម្រាក ច្រើនគ្នាក្អកក្រហែម... កូរពោះ... យ៉ាងចម្លែកណាស់ តែគ្រូបាននិយាយច្រើនដង ហើយថា " របស់ទាំងនោះកើតហើយរលត់ទៅវិញ កុំធ្វើអ្វីទាំងអស់..." គឺហាមមិនឱ្យអេះទាំងរមាស់នោះទៀតផង ។ **តទៅទំព័រទី ១៨**

# សម្តេចនរោត្តមសីហនុព្រះជន្ម៨៧ឆ្នាំ



••• កាលពីព្រះជន្ម ៨៦ ពលរដ្ឋខ្មែរបានឃើញសម្តេចឪ នរោត្តមសីហនុ តិចតួចណាស់ ដោយព្រះអង្គគង់នៅ បេយ៉ីង នៃ សាធារណរដ្ឋចិនប្រជាមានិត ។ នាឱកាសចំរើនព្រះជន្មគម្រប់ ៨៧ឆ្នាំ កាលពីថ្ងៃទី ៣១ តុលា ឆ្នាំ២០០៩ នេះ ព្រះអង្គបានបញ្ចេញលិខិតចំឡែកពីសព្វមួយដង ដែលយើងបកប្រែពីសំណេរពីភាសាបារាំងរបស់ព្រះអង្គដូចតទៅ :

**" ពីអ្នកអាយុវែងពេកមួយ " ដោយ ន. សីហនុ**

បេយ៉ីង, សាធារណរដ្ឋចិនប្រជាមានិត, ថ្ងៃទី២ តុលា ឆ្នាំ ២០០៩

ឪពុកខ្ញុំព្រះករុណា នរោត្តម សុរាម្រិត បានចូលទីវង្គត់ក្នុងព្រះជន្ម ៦៤ឆ្នាំ (ទឹកនោមផ្អែម) ឆ្នាំ ១៩៦០ ឪពុកក្មេករបស់គាត់ ព្រះករុណាមុនីវង្ស សុគតនៅក្នុងព្រះជន្ម ៦៤ (ដោយឈឺចាប់ចំពោះការបាត់បង់ខេត្តបាត់ដំបង បានទៅសៀម ដោយជប៉ុនជាអ្នកជួយ កាលពីឆ្នាំ ១៩៤១) ជីតាទួតខាងព្រះមាតារបស់ខ្ញុំ ព្រះករុណាស៊ីសុវត្ថិ មានឈ្មោះល្បីខាងអាយុវែង ក៏សុគតនៅព្រះជន្ម ៨៣ (ដោយជរាពាធ)... ។

ចំណែកខ្ញុំព្រះករុណា ដែលចង់សុគតយ៉ាងពិតប្រាកដក្នុងអនាគតយ៉ាងខ្លីបំផុតមួយ បានរស់នៅយូរពេកហើយ... ថ្ងៃទី៣១ តុលា ២០០៩ ខ្ញុំមានព្រះជន្ម៨៧ឆ្នាំ។

អាយុវែងរបស់ខ្ញុំជាទម្ងន់ដ៏ធ្ងន់មួយ ដែលស្ទើរឱ្យខ្ញុំទ្រាំមិនបាន ។

ដោយយល់ចិត្តខ្ញុំមិនច្បាស់ ជនរួមជាតិរាប់មិនអស់បានជូនពរឱ្យខ្ញុំមានព្រះជន្មលើស ១០០ឆ្នាំ ។ ជនប្រុសស្រីខ្លះទៀត ហ៊ានដល់ទៅជូនពរខ្ញុំឱ្យមានព្រះជន្មរហូត ៣០០ឆ្នាំ !!! ។

ខ្ញុំសូមអរគុណជនរួមជាតិទាំងអស់នោះ ដោយក្តីគួរសម និងស្រឡាញ់ ពុំមែនដោយលាក់គំនួចនោះទេ ។ ក៏ប៉ុន្តែ ដើម្បីឱ្យប្រាកដ និងគ្មានគំនួច ខ្ញុំសូមជូនជាព័ត៌មានដល់ទាំងអស់គ្នាថា (ខ្មែរ និងបរទេស) លោកអ្នកមិនបានធ្វើអ្វីឱ្យខ្ញុំសប្បាយចិត្តទាល់តែសោះ នៅពេលថ្វាយព្រះពរដល់ខ្ញុំឱ្យមានអាយុយឺនយូរនោះ ។ ដែលខ្ញុំចង់បាន គឺចូលទីវង្គត់ឱ្យបានឆាប់ជាទីបំផុតហើយដោយ មិនប្រឆាំងនឹងឱវាទព្រះពុទ្ធជាម្ចាស់ ដែលហាមមិនឱ្យសម្លាប់ខ្លួនឯង ។

**ហត្ថលេខា ន.សីហនុ**

***កំណត់និពន្ធខ្មែរប៉ុស្តិ៍*** : លិខិតនេះផ្សាយចេញពីវេបសាយរបស់ សម្តេចសីហនុ ដែលសាធារណជនអាចទាក់ទងទៅព្រះអង្គបាន ទោះជាអ្នកស្រឡាញ់ ឬស្អប់ព្រះអង្គក៏ដោយ ហើយស្របពេលតុលាការខ្មែរក្រហម បានកោះហៅរកសាក្សីជាច្រើនរូបរួចមកហើយ លើកលែងតែវរៈជនពីររូប ដែលមិនទាន់បានកោះ គឺ ហ៊ុន សែន និង សម្តេចសីហនុ តែពេលវេលាដែលត្រូវមកដល់ កាន់តែខិតហើយ ៕

# ខ្មែរ_បារាំងផ្ញើញត្តិរើកកាយសន្និសីទក្រុងប៉ារីសឆ្នាំ១៩៩១

**ក្រុងប៉ារីស** : ••• សហគមន៍បារាំងដើមកំណើតខ្មែរតំណាងដោយសមាគម ៦ បានសរសេរញត្តិមួយច្បាប់ ផ្ញើទៅប្រធានាធិបតីបារាំង និងប្រធានាធិបតីឥណ្ឌូណេស៊ី ដើម្បីសម្តែងការមិនពេញចិត្តចំពោះការអនុវត្តន៍កិច្ចព្រមព្រៀងក្រុងប៉ារីស ដែលមានប្រទេសទាំងពីរនោះ ជាសហប្រធាន នាឱកាសខួបទី ១៨ នៃសន្និសិទ្ធក្រុង ប៉ារីស ថ្ងៃទី ២៣ តុលា ឆ្នាំ ១៩៩១ ។

លិខិតនោះបានផ្តល់ការសង្កេតថា រដ្ឋាភិបាលខ្មែរពុំបានគោរពសិទ្ធិជាមូលដ្ឋានរបស់មនុស្ស បំពានលើរដ្ឋធម្មនុញ្ញ លើគោលការណ៍នៃលិទ្ធប្រជាធិតេយ្យ ប្រើអំពើហិង្សាលើអ្នកទំនាស់នយោបាយ-សហជីព-អ្នកសារព័ត៌មាន ។ ក្រៅពីនេះ នៅមានអំពើពុក រលួយ កេងប្រវ័ញ្ចយកដីធ្លីរាស្ត្រ យកផ្ទះសម្បែងនៅគ្រប់កន្លែង ។ ការសង្កេតក្នុងលិខិតនោះបន្តថា "វៀតណាម និងថៃ បានរំលោភបូរណភាពទឹកដីខ្មែរ ដោយផ្ទុយនឹងស្មារតីនៃសន្និសញ្ញាក្រុងប៉ារីស យ៉ាងជាក់ស្តែង ។

ហត្ថលេខីនៃញត្តិរបស់ខ្មែរ-បារាំង ទាំងនោះបានបញ្ជាក់ពីភាពធ្ងន់ធ្ងរនៃស្ថានការណ៍នៅកម្ពុជា ដោយពលរដ្ឋខ្មែរ ពុំដែលគេចផុតពីក្រីក្រ ពីភ័យខ្លាច និងពីការរំលោភពីសំណាក់រដ្ឋអំណាចខ្លួនឯង និងបរទេសយៀកណាម និងសៀមថៃមទៀត ។ រាស្ត្រខ្មែរពុំមានអ្វីសោះសម្រាប់ការពារខ្លួនទេ ក្រៅពីសង្ឃឹមលើការអនុវត្តន៍ពាក្យសន្យារបស់ហត្ថលេខីនៃភាគីសន្និសីទក្រុងប៉ារីសទាំងអស់ឱ្យបានត្រឹមត្រូវ ។ ពួកគេប្រកាសថា : *យើងខ្ញុំសូមអំពាវនាវ ដោយទទូចបំផុត ដល់លោកប្រធានាធិបតីនៃសាធារណរដ្ឋ ក្នុងឋានៈដ៏ខ្ពង់ខ្ពស់របស់លោកជាប្រធាននៃសន្និសីទសន្តិភាព នៅក្រុងប៉ារីសឆ្នាំ ១៩៩១ ស្តីពីកម្ពុជា សូមលោកពិនិត្យនូវលទ្ធភាពនៃការបង្កើតគណកម្មការអន្តរជាតិ ត្រួតពិនិត្យការអនុវត្តន៍កិច្ចព្រមព្រៀងសន្តិភាពនៃក្រុងប៉ារីសស្តីពីកម្ពុជានេះ ដោយមានភារកិច្ចជំរុញឱ្យរដ្ឋាភិបាលកម្ពុជា វៀតណាម និងថៃឡង់ គោរពយ៉ាងទៀតទាត់ចំពោះបទបញ្ញត្តិទាំងអស់នៃកិច្ចព្រមព្រៀង ដើម្បីជួយប្រទេសកម្ពុជា និងប្រជាជនឱ្យបានចាកផុតពីស្ថានភាពប្រកបដោយមហាគ្រោះថ្នាក់នៃការរលាយកម្ពុជា ហើយស្ដាបនាបាននូវសន្តិភាពពេញលេញ ស្ថេរភាព និងសន្តិសុខ ដើម្បីការអភិវឌ្ឍន៍ជាចាំបាច់នៃប្រទេសនេះ។*

*ធ្វើនៅទីក្រុងប៉ារីស (ប្រទេសបារាំង) ថ្ងៃទី ២៥ ខែតុលា ឆ្នាំ២០០៩*

អ្នកតំណាងសមគមសង្គមស៊ីវិល និងបាតុករ :

លោក **ឌី ការ៉េត** តំណាង គណៈកម្មាធិការព្រំដែនកម្ពុជា ប្រទេសបារាំង/ពិភពលោក

លោក **ទិត ហួន** តំណាង គណបក្សសមរង្ស៊ី-ប្រទេសបារាំង

លោក **លឹម ប៊ុន ស៊ីដារេត** តំណាង គណបក្សសិទ្ធិមនុស្ស-ប្រទេសបារាំង

លោកស្រី **ឌុក-រាស៊ី សេដ្ឋា** តំណាង ខ្មែរសម្ព័ន្ធការពារសិទ្ធិមនុស្ស និងសិទ្ធិបុរីជន

លោកស្រី **ឡុង តុន្នី** តំណាង សមាគមវប្បធម៌ខ្មែរ នៅភូមិភាគលីយ៉ុង

លោក **ប៉េង មុនីសាវ៉ា** តំណាង កិច្ចការទំនាក់ទំនងជាមួយបាតុករនៃសមាគមខ្មែរ ។

ញត្តិខាងលើនេះ ត្រូវបានលោកប្រធានធិបតីបារាំង សាកូស្ស៊ី ឆ្លើយតបនឹងលោក ស៊ាន ប៉េងសែ ថា លោកបានទទួល ហើយបញ្ជូនទៅលោករដ្ឋមន្ត្រីក្រសួងការបរទេសរួចហើយ ។ ចំណែកខាងឥណ្ឌូនេស៊ី វិញ យើងពុំបានទទួលដំណឹងថ្មីអ្វីឡើយ ៕

**ខ្មែរប៉ុស្តិ៍**

ឌឹ ខេមបូឌា ដេលី
The Cambodia Daily

ដំណឹងប្រែសំរួលពីភាសាអង់គ្លេស អត្ថបទបានអនុញ្ញាតិឱ្យធ្វើការចុះផ្សាយដោយ ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសៅរ៍-អាទិត្យ ទី៧-៨ ខែវិច្ឆិកា ឆ្នាំ២០០៩

# មន្ត្រីជាន់ខ្ពស់ថៃម្នាក់គំរាមបិទច្រកព្រំដែនទាំងអស់

ដោយ : FRANK RADOSEVICH និង SIMON MARKS
THE CAMBODIA DAILY

▸ យោងតាមសេចក្តីរាយការណ៍របស់ប្រព័ន្ធផ្សព្វផ្សាយ និងក្រុមមន្ត្រីរបស់រដ្ឋាភិបាលបានឱ្យដឹងថា ភាពតានតឹងរវាងប្រទេសកម្ពុជា និងប្រទេសថៃ បានបន្តអាក្រក់ទៅៗ កាលពីថ្ងៃសុក្រ ជាមួយនឹងការប្រមាណពីមន្ត្រីជាន់ខ្ពស់ថៃម្នាក់ថា ប្រទេសនេះនឹង "បិទច្រកព្រំដែនទាំងអស់" ប្រសិនបើប្រទេសកម្ពុជានៅតែគាំទ្រចំពោះអតីតនាយករដ្ឋមន្ត្រីថៃ លោក ថាក់ស៊ីន ស៊ីណាវ៉ាត្រា ។

លោក ស៊ូថេប ថោងស៊ុបាន់ ឧបនាយករដ្ឋមន្ត្រីថៃ ត្រូវបានទីភ្នាក់ងារសារព័ត៌មានបារាំង អាអេហ្វប៉េ ដកស្រង់សំដីដែលនិយាយថា " ប្រសិនបើប្រទេសកម្ពុជា នៅតែជ្រើសរើសយកឥរិយាបថរឹងទទឹង និងមិនសម្រប់សម្រួល ដូច្នេះយើងត្រូវតែបន្តបន្ថយទំនាក់ទំនង ហើយអាចនឹងបិទច្រកព្រំដែនទាំងអស់ទៀតផង" ។

នៅក្នុងសេចក្តីថ្លែងការណ៍មួយ ក្រសួងការបរទេសថៃ ក៏បានស្នើឱ្យទុកជាមោឃៈនូវអនុស្សារណៈយោគយល់គ្នារបស់ខ្លួនជាមួយកម្ពុជាផងដែរ ពាក់ព័ន្ធនឹងតំបន់ត្រួតស៊ីគ្នា នៅក្នុងសមុទ្រដែលសម្បូរដោយរ៉ែប្រេង និងឧស្ម័ន ។

ភាពកាន់តែអាក្រក់ផ្នែកទំនាក់ទំនងនេះ កើតមានឡើងបន្ទាប់ពីប្រទេសជិតខាងទាំងពីរបានកោះហៅមកវិញនូវឯកអគ្គរាជទូតរៀង១ខ្លួន កាលពីថ្ងៃព្រហស្បតិ៍ បន្ទាប់ពីមានការតែងតាំងជាផ្លូវការពីលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ចំពោះលោក ថាក់ស៊ីន ដែលរត់គេចខ្លួន ជាទីប្រឹក្សាសេដ្ឋកិច្ច ។

ការជ្រើសរើសយកលោក ថាក់ស៊ីន ដែលត្រូវបានបណ្តេញចេញក្នុងរដ្ឋប្រហារឆ្នាំ ២០០៦ ហើយបានគេចខ្លួនពីទោសជាប់ពន្ធនាគាររយៈពេល២ឆ្នាំក្រោមការចោទប្រកាន់ពីបទពុករលួយនោះ បានធ្វើឱ្យក្រុមមន្ត្រីថៃខឹង ដែលចាត់ទុកទង្វើនេះជាទង្វើដ៏អាក្រក់ចំពោះប្រទេសថៃ ។

នៅក្នុងអត្ថបទវិចារណកថាមួយកាសែតបាងកកប៉ុស្តិ៍ ជាភាសាអង់គ្លេសសរសេរថា សកម្មភាពរបស់លោក ហ៊ុន សែន បណ្តាលឱ្យមានការប៉ះពាល់យ៉ាងខ្លាំងដល់ការទំនាក់ទំនងទ្វេភាគីដោយធ្វើឱ្យទំនាក់ទំនងប្រទេសទាំងពីរធ្លាក់ដល់ស្ថានភាពដ៏ជូរចត់ ។

អត្ថបទនេះលើកឡើងថា "លើសពីនេះទៅ ទៀត ការសំពងនាពេលថ្មីៗនេះរបស់លោក ហ៊ុន សែន លើរដ្ឋាភិបាលថៃ គឺជារឿងដ៏អាក្រក់នៅក្នុងបរិបទការទូត ។ ចំណុចដ៏ធ្ងន់ធ្ងរមួយទៀត សញ្ញាដែលលោកបញ្ជូនទៅរដ្ឋាភិបាលរបស់លោក អភិស៊ិត វីចាជីវ៉ា គឺច្បាស់ណាស់ របបរបស់លោកមិនទទួលស្គាល់មេដឹកនាំក្រុងបាងកកទេ ហើយរបបនេះមិនមានការគោរពចំពោះច្បាប់ថៃឡើយ " ។

ជម្លោះដែលកំពុងតែបន្តនេះ ក៏ធ្វើឱ្យមានការចាប់អារម្មណ៍នៅក្នុងតំបន់ផងដែរ ដោយក្រសួងការ



បរទេសសិង្ហបុរី បានចេញសេចក្តីថ្លែងការណ៍មួយ កាលពីថ្ងៃសុក្រ ដែលនិយាយថា ជម្លោះដែលកាន់តែខ្លាំងឡើងៗនេះ "មិនល្អសម្រាប់អាស៊ានទេ" ហើយបានជំរុញឱ្យមានដំណោះស្រាយឆាប់ៗ ។

ទាំងលោក ហ៊ុន សែន និងនាយករដ្ឋមន្ត្រីថៃ លោក អភិស៊ិត វីចាជីវ៉ា បានធ្វើដំណើរទៅទីក្រុងតូក្យូ កាលពីថ្ងៃសុក្រ ដើម្បីចូលរួមកិច្ចប្រជុំកំពូលមេគង្គ ជប៉ុនជាលើកទី១ ។ លោក អៀង សុផាឡែត ជំនួយការរបស់លោក ហ៊ុន សែន បានមានប្រសាសន៍ថា លោកមិនបានដឹងថា តើមានជំនួបគ្រោងទុករវាងមេដឹកនាំទាំងពីរឬយ៉ាងណាទេ ។ ទីភ្នាក់ងារសារព័ត៌មានថៃ បានរាយការណ៍ថា លោក អភិស៊ិត នឹងមិនធ្វើអត្ថាធិប្បាយអំពីជំនួបដែលអាចមានណាមួយនោះទេ ដោយនិយាយថា មិនមានកិច្ចពិភាក្សាទល់មុខគ្នាត្រូវបានគ្រោងទុកនោះទេ ។

អ្នកនាំពាក្យក្រសួងការបរទេសកម្ពុជា លោក កុយ គួង បានមានប្រសាសន៍ថា ការតែងតាំង លោក ថាក់ស៊ីន គឺជាកិច្ចការផ្ទៃក្នុងដ៏ពិតប្រាកដ ហើយទុកឱ្យប្រទេសថៃជាអ្នកសម្រេច ។ លោកបានបន្ថែមថា កម្ពុជានៅតែមានឆន្ទៈធ្វើការ ឆ្ពោះទៅរកទំនាក់ទំនងដែលមានស្ថិរភាព ។ លោកបានបន្ថែមទៀតថា មន្ត្រីជាន់ខ្ពស់៣រូបទៀតមកពីស្ថានទូតកម្ពុជាប្រចាំទីក្រុងបាងកក ក៏នឹងវិលត្រឡប់មកទីក្រុងភ្នំពេញវិញ ។

លោក កុយ គួង បានមានប្រសាសន៍ថា "អ្វីៗគ្រប់យ៉ាងអាស្រ័យលើភាគីថៃ ។ នេះមិនមែនជាឥរិយាបថល្អសម្រាប់ប្រជាជនទាំងពីរទេ ។ មិនត្រឹមតែប្រជាជនកម្ពុជាប៉ុណ្ណោះទេ ដែលរងគ្រោះ ប៉ុន្តែប្រជាជនថៃក៏រងគ្រោះដែរ " ។

ចរាចរណ៍ឆ្លងព្រំដែននៅបន្តកាលពីថ្ងៃសុក្រ ថ្វីបើមានការព្រមានបិទច្រកព្រំដែនក៏ដោយ ហើយលោក គ្រួច វណ្ណី ប្រធានគ្រប់គ្រងសកម្មភាពជើងហោះហើររដ្ឋលេខាធិការដ្ឋានអាកាសចរណ៍ស៊ីវិល់រដ្ឋាភិបាល បានមានប្រសាសន៍ថា ជើងហោះហើររវាងប្រទេសកម្ពុជា និងប្រទេសថៃ មិនទាន់ត្រូវបានបង្អាក់ទេ ។

លោកបានមានប្រសាសន៍ថា " ក្រុមហ៊ុនបាងកកអ៊ែរវេយ៍ និងក្រុមហ៊ុនថៃអ៊ែរវេយ៍ នៅតែធ្វើការហោះហើរមកកម្ពុជានៅឡើយ ។ រហូតមកដល់ពេលនេះ ខ្ញុំមិនមានព័ត៌មានណាមួយដែលថា លែងមានជើងហោះហើរនោះទេ" ។

តទៅទំព័រទី ១៣

# Thai Official Threatens To Close Borders

By FRANK RADOSEVICH AND SIMON MARKS
THE CAMBODIA DAILY

▸ Tensions between Cambodia and Thailand continued to fester on Friday with a senior Thai Official warning the country would "seal off all border checkpoints" if Cambodia maintained its support for former Thai Premier Thaksin Shinawatra, according to media reports and government officials.

"If Cambodia still adopts a hard-line and uncompromising attitude, then we must continue to downgrade relation and maybe seal off all border Checkpoints," Thai Deputy Prime Minister Suthep Thaugsuban was quoted as saying by Agence France-Presse.

In a Statement, the Thai Foreign Ministry also proposed annulling its memorandum of understanding with Cambodia concerning the overlapping maritime claims area, which is rich in oil and gas deposits.

The sharp deterioration in relations comes after the neighboring nations recalled their respective ambassadors on Thursday following Prime Minister Hun Sen's formal appointment of the fugitive Mr Thaksin as an economic adviser.

The selection of Mr Thaksin, who was ousted in a 2006 coup and fled a two-year prison term for corruption charges, has rankled Thai officials who see the move as a blatant thumb in the eye to Thailand.

In an editorial, the English- language newspaper The Bangkok Post write Mr Hun Sen's action dealt a hefty blow to bilateral relations, dragging them down to a bitter nadir.

"To say the least, Mr Hun Sen's latest bombshell on the Thai government is highly deplorable in the diplomatic context. On a more critical aspect, the signal he has sent out to the Abhisit Vejjajiva government is more than clear his regime gives no recognition to the Bangkok leader and it has no respect for Thai law," the article read.

The spiraling row also attracted regional attention with the Singaporean Foreign Ministry issuing a statement on Friday saying the mounting friction "is not good for Asean" and pressed for a quick resolution.

Both Mr Hun Sen and Thai Prime Minister Abhisit Vejjajiva were in Tokyo on Friday attending the first Mekong-Japan summit. Eang Sophalleth, an assistant to Mr Hun Sen,

(Continued on page13 )

(តមកពីទំព័រទី ០១) **ខ្មែរក្រៅប្រទេសចូលរួមក្នុងកម្មវិធី...**

ខ្មែរក្រហមបានប្រព្រឹត្តការសម្លាប់មនុស្ស ដែលគេអាចប៉ាន់ចំនួនជាង២លាននាក់ ដោយធ្វើទារុណកម្ម ដោយបង្អត់អាហារ ឬដោយសម្លាប់ចោល ។ ជាង ៣០ឆ្នាំ ក្រោយមកការឈឺចាប់នៅតែបន្ត ទោះជាខ្មែរមកនៅក្រៅស្រុកហើយក៏ដោយ ក៏នៅតែប្រឈមមុខការស្វែងរកបញ្ចប់នូវអតីតកាលដ៏ឈឺចាប់ស្វែងរកអត្តសញ្ញាណផ្ទាល់ អត្តសញ្ញាណរបស់ជាតិ និងអត្ត-សញ្ញាណនៃព្រលឹងរបស់ខ្លួន ដើម្បីឱ្យបានក្លាយជាជនមានឋាមពល និងភាពជាសះស្បើយនឹងគេបាន ។

ASRIC បានរៀបចំព្រឹត្តិ-ការណ៍នេះឡើង ដើម្បីឱ្យអ្នកដែលសល់ពីស្លាប់ដោយអំពើឧក្រិដ្ឋកម្មនោះ មានលទ្ធភាពចូលរួមនិយាយអំពីរឿងបានរួចជីវិតរបស់ខ្លួន ដែលនេះជាវគ្គដ៏មានសារៈសំខាន់នាំទៅរកការរំដោះការជាសះស្បើយ និងការពង្រឹងដល់សហគមន៍ខ្មែរទាំងមូលបាន ។ ដោយសារតែជាផ្នែកមួយនៃវិធីព្យាបាល ASRIC នឹងផ្តល់នូវឱកាសមួយសម្រាប់អ្នកដែលនៅសល់ពីស្លាប់ទាំងនោះ ឱ្យអាចបញ្ចេញសម្លេងឱ្យគេបានឮនៅទីជំនុំជំរះក្តីចំពោះមេខ្មែរក្រហម ជាផ្លូវការ ដែលត្រូវប្រព្រឹត្តទៅនៅអង្គប្រជុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា ដោយជួយលោកអ្នករងគ្រោះទាំងនោះឱ្យអាចបញ្ចេញភស្តុតាងដាក់ជាបណ្តឹងជូនទៅតុលាការជម្រះក្តីបាន ។








អៀង សារី អៀង ធីរិទ្ធ


ខៀវ សំផន

លោកអ្នកប្តឹងជាដើមបណ្តឹង ឬបណ្តឹងស៊ីវិល :

**ដើមបណ្តឹង :**

បើអ្នកបានរងគ្រោះដោយសារអំពើឧក្រិដ្ឋកម្ម បានដឹងឮអំពីឧក្រិដ្ឋកម្ម ឬអ្នកអាចនឹងដាក់ព័ត៌មាននោះជូនទៅតុលាការ ក្នុងរូបភាពជាដើមបណ្តឹង ។

តុលាការអាចនឹងសម្រេចថា ទទួលឬមិនទទួលប្រើព័ត៌មាននោះប្រឆាំងនឹងចុងចោទ ក្នុងរយៈពេល ៦០ថ្ងៃ គិតតាំងពីថ្ងៃដែលដាក់ពាក្យបណ្តឹងទៅ ។ បើអ្នកដាក់ពាក្យក្នុងនាមជាដើមបណ្តឹង ការចូលរួមរបស់អ្នកនឹងត្រូវចប់តួនាទីនៅពេលដាក់ពាក្យរួចហើយភ្លាមនោះ ។

**បណ្តឹងរដ្ឋប្បវេណី ឬ ស៊ីវិល :**

បើអ្នកទទួលរងគ្រោះដោយអំពើឧក្រិដ្ឋកម្ម ដែលនៅក្នុងរង្វង់ការគ្រប់គ្រងរបស់តុលាការជំរះក្តីខ្មែរក្រហម ហើយមានការឈឺចាប់លើរូបរាងកាយ ខូចខាតលើទ្រព្យសម្បត្តិមានការរបួសផ្លូវចិត្ត ដែលមានទាក់ទងដោយចំពោះទៅឧក្រិដ្ឋកម្មដោយខ្មែរក្រហមនោះ អ្នកអាចប្តឹងខាងផ្នែករដ្ឋប្បវេណីបាន ។ ជនជាប់ចោទក្នុងសំណុំរឿង ០០២ មានតែ នួន ជា . អៀង សារី . អៀង ធីរិទ្ធ និង ខៀវ សំផន ប៉ុណ្ណោះ ។ ជនរងគ្រោះមិនអាចប្តឹងក្នុងសំណុំរឿង០០១ ប្រឆាំងនឹង ឌុច ទៀតទេ ដោយករណី ឌុច មិនត្រូវ បានតុលាការទទួលយកតទៅទៀតទេ ។

**កម្មវិធី**

ថ្ងៃសុក្រ និងថ្ងៃសៅរ៍ ទី១៣-១៤ ខែវិច្ឆិកា ឆ្នាំ ២០០៩ ពីម៉ោង ១០:០០ ដល់ ៦:០០ល្ងាច ណែនាំអំពីការងាររបស់ ASRIC និងដំណើរការជំនុំជំរះរបស់តុលាការពិសេសនៅកម្ពុជាបុគ្គលិក ASRIC នឹងជួយលោកអ្នកក្នុងការបំពេញសំណុំរឿងរងគ្រោះដើម្បីដាក់បញ្ជូនទៅតុលាការ ។

**ទីកន្លែងប្រជុំ**

Pro-Act
444 North 3rd St. Suite 307
Philadelphia, PA 19123

(តមកពីទំព័រទី ០៤)

**ឆ្លងកាត់ក្រុងខ្មែរ... កុំភ្លេចទៅញាំ...**

ចំនួន7មុខខុស១គ្នាសម្រាប់តម្រូវការអ្នកទិញចង់បានតម្លៃនំពី4.99ដុល្លារ ទៅ20ដុល្លារអា-មេរិក ។ ដែលជារៀងរាល់ថ្ងៃអ្នកទិញមានជនជាតិស្ពែនីស, អាមេរិកាំងស្បែកស ឬខ្មៅ និងបងប្អូនខ្មែរយើងផងដែរ មានមកជាហូរហែរ ។

ស្ត្រីស្អាតម្នាក់ដែលជាអ្នកលក់ដូរនំ PIZZA នោះបាននិយាយថា ការលក់ដូរវាដាច់គួរសម មានភ្ញៀវចូលមកទិញជាបន្តបន្ទាប់ក្នុងរយៈពេលដែលយើងទើបតែបើកបាន4ខែមកនោះ ជាមួយការលក់គ្រឿង ភេសជ្ជៈ កាហ្វេ និងទឹកផ្លែឈើកិនជាដើម ហើយនំ PIZZA រាប់រយនំត្រូវបានលក់ចេញ ។

បុរសចំណាស់ម្នាក់ដែលសកម្មភាពដៃរបស់គាត់កំពុងមមាញឹកជាមួយការវាយម្សៅ ដើម្បីផលិតនំបានប្រាប់អ្នកកាសែតយើងឱ្យដឹងថា គាត់ត្រៀមម្សៅ និងគ្រឿងផ្សំក្នុងការផលិតនំជាបន្តបន្ទាប់តាមតម្រូវការអ្នកទិញចាប់ពីម៉ោង 10ព្រឹកដល់ម៉ោង10យប់ ។

ភ្ញៀវជាច្រើននាំគ្នានិយាយថា នំ PIZZA នៅ ហាង ROMA ដែលអ្នកផលិតធ្វើនំ PIZZA ជាខ្មែរធ្វើនំបានល្អមានរសជាតិពិសារទៅឆ្ងាញ់ជាមួយការរាក់ទាក់ពីអ្នកលក់ដូរ និងថៅកែទៀតផង ចេះលេងសើចសប្បាយជាមួយអតិថិជន ។ ដែលទាំងអស់នេះ គឺជាការទាក់ទាញភ្ញៀវឱ្យនិយមចូលចិត្តឆ្ពោះទៅរកការគាំទ្រពីអ្នកទិញ និងបង្កើនអ្នកទិញបន្ថែមទៀត ដែលអាចធ្វើឱ្យជំនួញនេះមានការរីកចម្រើនទៅមុខទៀត ។ ដូច្នេះបើបងប្អូនខ្មែរឆ្លងកាត់ទីក្រុង ខ្មែរកុំភ្លេចទៅញ៉ាំ PIZZA នៅហាង ROMA ៕

# A.B.C MONEY TRANSACTION, INC

# $ ក្រុមហ៊ុនផ្ញើប្រាក់ A.B.C



## តម្លៃសំរាប់ផ្ញើទៅស្រុកខ្មែរ

| | | ភ្នំពេញ | តាមខេត្ត |
|---|---|---|---|
| ផ្ញើ $100 | យកកម្រៃ | $4.50 | $5.50 |
| $200 | យកកម្រៃ | $9.00 | $11.00 |
| $300 | យកកម្រៃ | $13.50 | $16.50 |
| $500 | យកកម្រៃ | $16.00 | $17.00 |
| $1000 | យកកម្រៃ | $25.00 | $26.00 |
| $1500 | យកកម្រៃ | $35.00 | $36.00 |
| $2000 | យកកម្រៃ | $42.00 | $43.00 |
| $2200 | យកកម្រៃ | $46.00 | $47.00 |

សូមកុំភ្លេចទាក់ទងការិយាល័យក្រុមហ៊ុន ABC ដែលនៅជិតលោកអ្នក ប្រសិនបើមានបំណងចង់ផ្ញើប្រាក់ទៅស្រុកខ្មែរ ឬក៏ទូរស័ព្ទមកយើងតាម

### នៅរដ្ឋ VIRGINIA សូមទាក់ទង

**ABC MONEY TRANSATION ,INC.**

8 locations to serve you in Virginia

- 6757 Willson Blvd.-Ste.#25 Tel : 703.534.2600
- 4291 Holland Rd-Ste.#111 Tel : 757.474.9400
- 10428 Ridgefield Pkwy Tel : 804-740-2454
- 2519 W . Mercury Blvd . Tel : 757.265.6305
- 23520 Overland Dr. Tel : 703.661.6666
- 6314 Rigsby Rd. Tel : 804.288.2988
- 7252 Arlingston Blvd . Tel : 703.641.0778
- 6217 W. Broad St. Tel : 804.288.6988

**ARIZONA**
- 4215 N 19th Ave. . Tel : 602.266.6744

**GEOERGIA**
- 4897 Buford Hwy. Ste. 202. Tel: 770.457.7888

**ILLINOIS**
- 4871 N. Broadway . Tel :773.989.7332

**MASSACHUSETTE**
- 996 Dorchester Ave. Tel:617.825.9380
- 1365-1377 Dorchester Ave. -Ste.4,Froor 1 .Tel : 617.265.4600

**MINNESOTA**
- 2718 Nicollet Ave . S.- Ste. 102 B
- Tel : 612.871.4731
- 6350 Brooklyn Blvd . Tel : 763.503.3947

**NORTH CAROLINA**
- 3000 Central Ave. Ste . #9 . Tel : 704-532-4420

**OREGON**
- 6908 N.E. Sandy Blvd . Tel : 503.281.8088

**PHILADFELPHIA**
- 5520 . Whitaker Ave. -Unit 2 . Tel : 215.831.9794
- 571 Adams Ave . Ave.#4 . Tel : 215.342.6623

**TEXAS**
- 1818 E . Pioneer Pkwy. Ste.156 . Tel : 317.461.1461
- 2615 W . Pioneer Pkwy. Ste.136 . Tel : 214.788.2817
- 5302 E . Belknap St.- Ste.D6 . Tel : 817.831.4836
- 3538 W . Walnut St. Tel : 972.272.2253
- 11205 Bellaire Blvd . Tel : 281.561.6600
- 10909 Scarsdale Blvd . Tel : 281.481.2700
- 13480 Veterans Memorial Dr.-Ste. F2. Tel: 281.587.0807

**WASHINTON STATE**
- 766 S.38th St,. Tel : 253.475.2847
- 3818 S.Graham St.-Ste. C Tel : 206.721.2070

Office : 714-590-8740 Fax : 714-590-8776
Cell: 714-603-3509 Toll Free : 1-877-939-0110

## ក្រុមហ៊ុនទទួលផ្ញើប្រាក់ទៅកម្ពុជា

ABC ជាក្រុមហ៊ុនផ្ញើប្រាក់តែមួយគត់នៅស្រុកខ្មែរ ដែលមានការប្រគល់ប្រាក់ដល់ផ្ទះ

- ស្របច្បាប់
- រហ័សទាន់ចិត្ត
- ធានារ៉ាប់រង និងជូនប្រាក់ទៅដល់ផ្ទះ
- កំរៃផ្ញើថោកជាងកន្លែងដទៃ

### ក្រៅពីការផ្ញើប្រាក់ក្រុមហ៊ុនមានលក់

PHONE CARD និង PINLESS សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ដែលផលិតដោយក្រុមហ៊ុន ABC ផ្ទាល់ មានគុណភាពល្អ ហើយជាពិសេស CARD របស់យើងនឹងទុកបានរហូត មិនអស់កំណត់កាលឡើយ ( NEVER EXPIRED) ។

ត្រូវការអ្នកសហការ (AGENTS ) ជាមួយយើងទូទាំងសហរដ្ឋអាមេរិក និងបានទទួលប្រាក់ចំណូលយ៉ាងខ្ពស់ !

ព័ត៌មានបន្ថែមសូមទាក់ទង CHET THACTHER តាមទូរស័ព្ទ និងអាស័យដ្ឋានខាងក្រោម :

ABC MONEY TRANSATION, INC
12019 Garden Grove Blvd., Ste.#204
Garden Grove , CA 92843
chesterthatcher@yahoo.com

# HONG KONG SUPERMARKET

## FAMER´S BEST






$1.69/can




3 for $10

**Newly Renovated.**
**Added new section .**
**Clean and Improved management !**

ទើបនឹងកែលំអរថ្មីឡើងវិញ
-បន្ថែមផ្នែកលក់ថ្មីទៀត
ហាងស្អាត ហើយបង្កើន
គុណភាពគ្រប់គ្រង

**Weekly Sale**

លក់ចុះថ្លៃរៀងរាល់សប្តាហ៍




$2.99/bag




$7.99



$2.99






$6.99/box




$1.29/can



$2.49/28oz



$2.49/bag




2 for $3



$4.99 / lb




$4.99

**OPEN 7 DAY**
**8:00-9:00**

571 ADAMS AVE.PHILADELPHIA,PA19120
Tel: 215-72801300 Fax: 215-728-1600

- ចំណាយ **$140**ដុល្លារ ទទួលបានអង្ករស្រូវស ២៥ ផោន
- ចំណាយ **$100**ដុល្លារ ទទួលបាននូវភេសជ្ជៈ ឬមីកញ្ចប់មួយប្រអប់(តម្លៃ**8.99**)
- ចំណាយ **$25** ដុល្លារទទួលបានទឹកសណ្តែកមួយដប ឬទឹកត្រីមួយដប ។

# ខ្មែរប៉ុស្តិ៍នៅមហាវិទ្យាល័យ "ថែមពិល" (TEMPLE)



សុបិន និងនាយកកាសែត (AL DIA) កំពុងឆ្លើយសំនួរសាធារណជន

●●●ខ្មែរប៉ុស្តិ៍តំណាងដោយ សុបិន ថាច់ បានចូលរួមបង្ហាញសារព័ត៌មានខ្មែរផ្សព្វផ្សាយសម្រាប់សហគមន៍ខ្មែរ នៅចំពោះមុខសាធារណជន ចម្រុះជាតិសាសន៍ ជាពិសេស គ្រូ និង និស្សិត ប្រមាណជាង២០០នាក់ ដែលមានបំណងចង់យល់ពីឧស្សាហកម្មព័ត៌មានសម្រាប់សហគមន៍ជនជាតិភាគតិចនៅក្នុងតំបន់ កាលពីថ្ងៃសៅរ៍ ទី ៧ វិច្ឆិកា ។

សារព័ត៌មាន " អាល់ ដាយ៉ា" (AL DIA) ជាភាសា ស្បានីស ចេញផ្សាយរាល់ថ្ងៃ ចំនួន១៨.០០០ច្បាប់ នៅក្នុងតំបន់ហ្វីឡាដែលហ្វៀសម្រាប់ជនជាតិភាគតិចដ៏ធំជាងគេបង្អស់នៅសហរដ្ឋអាមេរិក ។ កាសែតនេះមានព័ត៌មានរបស់សហគមន៍មានរចនាសម្ព័ន្ធសមរម្យ មានបុគ្គលិកអាចរស់ ហើយទទួលប្រាក់ចំណេញបានទៀតផង ។ កាសែតខ្មែរប៉ុស្តិ៍ ជាកាសែតបំរើព័ត៌មានសហគមន៍ដូចគ្នាដែរ តែអាយុនៅក្មេងខ្ចី គ្មានបុគ្គលិក ហើយប្រាក់ចំណូលពេលនេះបានឡើងមកដល់ដំណាក់ការណ៍គ្រប់គ្រាន់សម្រាប់ចំណាយចាំបាច់ឱ្យកាសែតចេញបានហើយ ។ សុបិន ថាច់ បាននិយាយទៅកាន់អ្នកស្ដាប់នៅក្នុងបន្ទប់ជំនុំកាសែតលេខ ១៤ ថា " សហគមន៍ខ្មែរមិនដែលមានកាសែត ឬព័ត៌មានពីសហគមន៍ខ្លួនទេ តាំងពី៣០ឆ្នាំមកហើយ -ខ្មែរប៉ុស្តិ៍ជាកាសែតតែមួយដែលនិយាយពីសហគមន៍ខ្លួន នៅហ្វីឡាដែលហ្វៀ និងនៅឡុងប៊ិច -ខ្មែរៗ ចូលចិត្តអានណាស់ ហើយយើងរក្សាអ្នកអានទាំងនោះដោយព័ត៌មានពិត និងមិនប្រកាន់បក្សពួកតែប៉ុណ្ណោះ -រីឯប្រាក់ទ្រទ្រង់កាសែត បើរង់ចាំតែខ្មែរសុទ្ធរស់មិនបានទេ -ខ្មែរមានពាណិជ្ជកម្មចំនួនតិច និងតូចៗថែមទៀត ។

នៅ ហ្វីឡាដែលហ្វៀ កាសែត ចិន យួន កូរ៉េ "បានបោះពុម្ពផ្សាយដែរ តែព័ត៌មានដែលមានលក្ខណៈដកស្រង់ពីប្រភពផ្សេងៗ ឬក៏ទិញព័ត៌មានពីទីភ្នាក់ងារព័ត៌មាន ដើម្បីផ្គួបជាមួយនឹងការផ្សព្វផ្សាយពាណិជ្ជកម្មខុសគ្នាពីខ្មែរប៉ុស្តិ៍ ដែលផលិតព័ត៌មាន រូបថត រូបគំនូរ ដោយខ្លួនឯងមិនតិចជាង ៨០%ទេ ។ នៅលើសំនួរថា តើអ្នកមានអ្វីដែលធានាថា ព័ត៌មានដែលអ្នកទទួលបាននោះជាដំណឹងពិតជារហូតបាននោះ?" សុបិន ឆ្លើយជំនួសវាគ្មិនឯទៀតៗ "កាសែតអាចត្រូវគេប្ដឹងនៅប្រទេសសេរីទេ " ធ្វើឱ្យអ្នកស្ដាប់ផ្ទុះសំណើច ហើយ សុបិន បន្ថែមថា " មានគេប្ដឹងយើងម្ដងដែរ តែមិនសម្រេចដោយសារដំណឹងនោះពិត ហើយមានភស្តុតាងគ្រប់គ្រាន់ ។

នៅពេលជាមួយគ្នានោះដែរ អ្នកផលិតកម្មវិធីទូរទស្សន៍ វិទ្យុ និងអាំងទ័រណែត ក៏បានចូលរួមក្នុងកម្មវិធីថ្ងៃនោះដែរ ។ អ្នកឯកទេសច្រើនរូបបានមកបង្ហាត់បង្ហាញស្នាដៃនៃការអភិវឌ្ឍន៍មុខរបរខាងវិស័យផ្សព្វផ្សាយដំណឹងប្រកបដោយបច្ចេកទេសខ្ពស់ និងគ្មានលាក់លៀម ដើម្បីគោលដៅជួយបង្កើនគុណភាពវិស័យផ្ដល់ព័ត៌មានចែកជូនដល់សហគមន៍ជនជាតិភាគតិចដែលមានចំនួនដ៏ច្រើននៅហ្វីឡាដែលហ្វៀនេះ ៕ ខ្មែរប៉ុស្តិ៍

# ឆ្លងកាត់ក្រុងខ្មែរ... កុំភ្លេចទៅញ៉ាំ PIZZA នៅហាង ROMA




## +ខ្មែរក្នុងមុខរបរថ្មីនៃហាង PIZZA :

Long Beach, **ខ្មែរប៉ុស្តិ៍ : វ៉ាន់ថា**

●●●នៅពេលដែលយើងធ្វើដំណើរឆ្លងកាត់ ផ្លូវAnaheim ដែលជាកណ្ដាលបេះដូងនៃក្រុងខ្មែរ Long Beach ផ្ដុំទៅដោយអ្នកជំនួញខ្មែរយ៉ាងច្រើនស្អេះស្កះមួយនៅក្រៅប្រទេសនោះ ។ ប៉ុន្តែអ្វីដែលអ្នកកាសែតខ្មែរប៉ុស្តិ៍យើងចង់លើកយកមកនិយាយ គឺមុខរបរថ្មីនៃខ្មែរម្នាក់ដែលបានចាប់យកអាជីពរកស៊ីបើកហាងលក់ PIZZA **តទៅទំព័រទី ០៤**

ឌឹ ខេមបូឌា ដេលី
The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទបានអនុញ្ញាតិឱ្យធ្វើការចុះផ្សាយដោយ ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសៅរ៍-អាទិត្យ ទី៧-៨ ខែវិច្ឆិកា ឆ្នាំ២០០៩

(តមកពីទំព័រទី ០៨)

## មន្ត្រីជាន់ខ្ពស់ថៃម្នាក់គំរាមបិទ...

លោក វណ្ណី បានមានប្រសាសន៍ថា មិនមានផែនការណាមួយតាំងនាមឱ្យរដ្ឋលេខាធិការដ្ឋានអាកាសចរណ៍ស៊ីវិល ត្រូវបានរៀបចំក្នុងករណី ដែលអាចមានការបង្អាក់ដល់ប្រតិបត្តិការជើងហោះហើររវាងប្រទេសកម្ពុជា និងប្រទេសថៃនោះទេ ។

ចំពោះតំបន់កាន់កាប់ត្រួតស៊ីគ្នា ក្រសួងការបរទេសថៃ និយាយថា "ខ្លួនមានទស្សនៈថា ការតែងតាំងលោក ថាក់ស៊ីន ជាទីប្រឹក្សាសេដ្ឋកិច្ចរបស់រាជរដ្ឋាភិបាលកម្ពុជា នឹងធ្វើឱ្យប៉ះពាល់ដោយផ្ទាល់ដល់ការចរចាររវាងថៃ និងកម្ពុជា ក្រោមក្របខណ្ឌអនុស្សារណៈនៃការយោគយល់គ្នានេះ ដោយសារថាលោក ថាក់ស៊ីន បានជាប់ពាក់ព័ន្ធដោយផ្ទាល់នៅក្នុងដំណើរការចរចានេះ ។

សេចក្តីថ្លែងការណ៍នេះ ក៏បានលើកឡើងដែរថា ល្បឿនយឺតយ៉ាវនៃការចរចាដែលកំពុងតែដំណើរការនេះ មានន័យថា " ប្រទេសទាំងពីរគួរតែរកវិធីផ្សេង សម្រាប់ធ្វើការចរចាដោយអនុលោមតាមគោលការណ៍ច្បាប់អន្តរជាតិ ដើម្បីសម្រេចបានដំណោះស្រាយដោយស្មើភាព " ។

នៅពេលត្រូវបានប្រាប់អំពីសេចក្តីរាយការណ៍ដែលចេញមកពីប្រទេសថៃ ស្តីអំពីតំបន់កាន់កាប់ត្រួតស៊ីគ្នានេះ លោក សុខ អាន រដ្ឋមន្ត្រីទទួលបន្ទុកទីស្តីការគណៈរដ្ឋមន្ត្រី ដែលជាប្រធានអាជ្ញាធរប្រេងកាតជាតិកម្ពុជាដែរនោះ គ្រាន់តែសើចមុនពេលឆ្លើយថា " ខ្ញុំរវល់ណាស់ ហើយខ្ញុំនឹងនិយាយជាមួយអស់លោកវិញនៅពេលក្រោយ" ។

លោក កុយ គួង អ្នកនាំពាក្យក្រសួងការបរទេស បានមានប្រសាសន៍ថា លោកបានដឹងអំពីសេចក្តីសម្រេចរបស់ប្រទេសថៃ ដើម្បីបញ្ចប់អនុស្សារណៈនៃការយោគយល់គ្នានេះ ហើយបានមានប្រសាសន៍ថា វានឹងធ្វើឱ្យរាំស្ទះដល់ការចរចាអំពីបញ្ហានេះ ។

លោកមានប្រសាសន៍ថា មិនពេលភាគីថៃ លុបចោលអនុស្សារណៈនេះ ការចរចាអំពីបញ្ហាព្រំដែនគោក និងព្រំដែនទឹក បានដំណើរការយ៉ាងយឺត ។ នេះដោយសារនីតិវិធីផ្ទៃក្នុងមានភាពស្មុគស្មាញនៅក្នុងប្រទេសថៃ "។

លោក កុយ គួង បានបន្ថែមថា ការប៉ុនប៉ងណាមួយ ដើម្បីសង្គ្រោះអនុស្សារណៈនៃការយោគយល់ដែលមានបញ្ហាច្រើននេះ គឺអាស្រ័យលើវិធានការនៅពេលអនាគតរបស់ប្រទេសថៃ ចំពោះការចរចាជាមួយកម្ពុជា ។

លោក វ៉ា គីមហុង ប្រធានគណៈកម្មាធិការបោះបង្គោលព្រំដែនរបស់រដ្ឋាភិបាល បានមានប្រសាសន៍ថា តាមច្បាប់អន្តរជាតិ រដ្ឋាភិបាលថៃ មិនត្រូវបានអនុញ្ញាតឱ្យលុបចោលកិច្ចព្រមព្រៀងណាមួយដែលត្រូវបានធ្វើឡើងដោយរដ្ឋាភិបាលមុននោះទេ ។

លោកបានមានប្រសាសន៍ថា "គ្មានចំណុចណាមួយនៃអនុស្សារណៈនៃការយោគយល់គ្នានេះ ដែលអនុញ្ញាតឱ្យភាគីរដ្ឋមួយទៀត លុបចោលវាបានទេ"។ "តាមច្បាប់អន្តរជាតិកិច្ចព្រមព្រៀងនោះ ត្រូវតែអនុវត្តន៍រហូតដល់បញ្ចប់បេសកកម្មរបស់ខ្លួន" ។

អ្នកអង្កេតការនយោបាយជាច្រើនបានស្នើឱ្យប្រទេសទាំងពីររក្សាការចរចា ថ្វីបើមានសកម្មភាពតបតតាមរយៈការទូតរបស់ប្រទេស ទាំងពីរក៏ដោយ ប៉ុន្តែអ្នកអង្កេតការមួយចំនួនតូចប៉ុណ្ណោះ ជឿថានេះជាការងារសាមញ្ញ ។

លោក បាវីន ឆាឆាវ៉ាល់ប៉ុងពុន អ្នកស្រាវជ្រាវដែលមកធ្វើទស្សនៈកិច្ចនៅវិទ្យាស្ថានសិក្សាអំពីអាស៊ីអាគ្នេយ៍ នៅប្រទេសសិង្ហបុរី បានសរសេរថា "ដោយសារមិនមានបណ្តាញទំនាក់ទំនងវានឹងធ្វើឱ្យការចរចានៅពេលអនាគតកាន់តែមានការលំបាកថែមទៀត ។ ត្រង់ចំណុចដ៏សំខាន់នេះ ប្រទេសទាំងពីរត្រូវការឱ្យមានការចរចាមិនមែនសង្គ្រាមពាក្យសំដីទេ" ។

ទោះបីជាយ៉ាងណាលោកមានប្រសាសន៍ថា លោកយល់ស្របតាមសេចក្តីសម្រេចរបស់ប្រទេសថៃ ក្នុងការដកបេសកជនរបស់ខ្លួន ។

លោកបានសរសេរថា " លោក ហ៊ុន សែន ពិតជារុញច្រានលោក អភិស៊ិត ទៅជ្រុងម្ខាង ហើយធ្វើឱ្យគេដឹងថា លោកចង់បានមិត្តភាពជាមួយ ថាក់ស៊ីន ជាជាងមិត្តភាពទ្វេភាគីទាំងមូល" ។ "ពេលនេះ លោក ហ៊ុន សែន បានទទួលនូវផលប្រយោជន៍មួយចំនួន ដោយការក្រោកឈរប្រឆាំងប្រទេសថៃដែលធំជាង ហើយនៅជាមួយគ្នានេះដែរ ក៏ដើម្បីសង្គ្រោះលោក ថាក់ស៊ីន ដែលលោក ហ៊ុន សែន បានវិនិយោគជាច្រើនជាមួយគ្នាយ៉ាង" ។

លោកសាស្ត្រាចារ្យ ហ្គូតធំ អារីយ៉ា ប្រធានស្រាវជ្រាវសម្រាប់ការបង្កើតសន្តិភាពនៅសកលវិទ្យាល័យម៉ាហ៊ីឌុលក្នុងទីក្រុងបាងកក បានសរសេរតាមអ៊ីម៉េលថា លោកមិនអាចធ្វើអត្ថាធិប្បាយបានទេ "ដោយគ្រាន់តែមានយោបល់ថា យើងគួរតែប្រុងប្រយ័ត្នមិននិយាយអ្វីដែលអាចនាំឱ្យមានការកើនឡើងនៃភាពតានតឹង" ។ លោកពិតជាបានស្នើឱ្យប្រទេសទាំងពីរដោះស្រាយភាពខ្វែងគំនិតគ្នារៀងៗខ្លួន ។

លោកបានសរសេរថា "ការអត្ថាធិប្បាយជាទូទៅរបស់ខ្ញុំ គឺថាភាគីមានជម្លោះគួរស្វែងរកដំណោះស្រាយដោយសន្តិវិធី ហើយដោះស្រាយការទូតគួរតែប្រើឱ្យអស់ពីលទ្ធភាព" ។

នៅឯប្រាសាទព្រះវិហារឧត្តមសេនីយ៍ទោ ស្រី ឌិក មេបញ្ជាការកងទ័ពលេខ៣ បានមានប្រសាសន៍ថា ស្ថានភាពដែលប្រទេសទាំងពីរ បានតស៊ូនៅក្នុងតំបន់ព្រំដែន ដែលមានជម្លោះនៅតែមានភាពស្ងប់ស្ងាត់កាលពីយប់មិញ ។ លោកបានមានប្រសាសន៍ថា " ប៉ុន្តែខ្ញុំមិនអាចធានាថា អ្វីដែលនឹងកើតឡើងនៅថ្ងៃស្អែក ឬថ្ងៃខានស្អែកនោះទេ" ។

*(រាយការណ៍បន្ថែមដោយ ផាន់ អាណា និង គុជ ណារ៉េន)*

(Continued From page08 )

## Thai Official ...

said he did not know if there were any scheduled meetings between the two leaders. The Thai News Agency reported Mr Abhisit would not comment on any possible encounters, saying no face-to-face discussions were scheduled.

Spokesman for the Cambodia Foreign Affairs Ministry Koy Kuong said the appointment of Mr Thaksin was strictly an internal affair and placed the ball squarely in Thailand·s court, adding Cambodia was still willing to work toward stable relations. He added that three other senior officials from the Cambodian embassy in Bangkok would be returning to Phnom Penh.

"Everything is up to the Thai side," Mr Kuong said. "It is not good behavior for the two people. Not only Cambodian people suffer but the Thai people also suffer."

Cross-border traffic continued on Friday despite the border closure warning and Kroch Vandy, chief of flight movements control at the government's State Secretariat for Civil Aviation, said flights operating between Cambodia and Thailand have not been disturbed.

"Bangkok Airways and Thai Airway are still entering into Cambodia," he said "So far I have had no news that flights stop".

Mr Vandy said that no plans on the behalf of the SSCA had been drawn up in the eventuality of disrupted flight operations between Cambodia and Thailand.

For the overlapping claims area, the Thai Foreign Ministry stated it "is of the view that the appointment of [Mr Thaksin] as an economic adviser to the Royal government of Cambodia will directly affect negotiation between Thailand and Cambodia under the framework of this MOU due to the fact that [Mr Thaksin] was directly involved in the negotiation process."

The statement also said that the slow speed at which negotiation had been progressing meant "both countries should employ other avenues of negotiation in accordance with the principles of international law to achieve en equitable solution."

When told about the reports coming out of Thailand on the overlapping claims area. Cabinet Minister Sok An, who also acts as Chairman of the Cambodia National Petroleum Authority, simply laughed before answering: "I am too busy and I'll come back to you later on."

Mr Kuong, foreign ministry spokesman, said that he was aware of Thailand ·s decision to revoke the MOU and said, if indeed implemented, the decision would grind negotiation over the matter to a halt.

"Before this cancellation by the Thai side, the negotiation on border issues on land and water have gone down very slowly," he said. "It is because of the complicated internal procedures in Thailand."

Mr Kuong added that any attempt to rescue the beleaguered MOU would depend on Thailand·s future approach to negotiation with Cambodia.

Var Kim Hong, chairman of the government's border demarcation committee, said that the Thai government, under international law, cannot cancel the MOU made between the two countries as a newly appointed government is not allowed to cancel any agreements made by the previous one.

"There is no point in the MOU that allows another state party to cancel it," he said. "By international law, that agreement must be implemented until the completion of its mission."

Several political observers called upon the two nations to maintain talks despite their diplomatic tit-for-tat. But few believe that would be a simple task.

"Since there is no channel of communication, it will make future negotiation even more difficult. At this critical juncture, they need more than anything else dialogue and not war of words," wrote Pavin Chachavalpongpun, a visiting research fellow at the Institute of Southeast Asian Studies in Singapore.

He said, however, he agreed with Thailand·s decision to remove their envoy.

"Hun Sen really pushes Abhisit to the corner and makes is known that he prefers his friendship with Thaksin rather that with overall bilateral relations," he wrote. "This time around, Hun Sen has gained some benefits by standing up against bigger Thailand, and in the meantime rescuing Thaksin whom Hun Sen has invested so much in."

Professor Gothom Arya, director of the Research Center for Peace Building at Mahidol University in Bangkok, wrote in an e-mail he could not comment, "having in mind that we should be careful not to say anything that may contribute to the increase of the tension." He did cal for the two countries to work out their respective differences.

"My general comment is that parties to conflict should seek peaceful resolution and diplomatic approach should be used to maximum effect," he wrote.

At the Preah Vihear temple, Major General Srey Dek, commander of RCAF Division 3, said the situation where both countries have fought in the disputed boundary zone remained calm last night.

"But I can't guarantee what will be happening tomorrow or in the upcoming days," he said.

*(Additional reporting by Phann Ana and Kuch Naren)*

(តមកពីទំព័រទី ០១) **ព្រះរាជពិធីបុណ្យអុំទូក ៣ ថ្ងៃ...**

ទូទាំងព្រះរាជាណាចក្រកម្ពុជា ដែលមានចំនួន ប្រមាណជាង២លាននាក់ ។

លោក ជា សុខុម អគ្គលេខាធិការគណៈកម្មការរៀបចំបុណ្យជាតិ បានប្រាប់ដល់អ្នកសារព័ត៌ិ យើងឱ្យដឹងថា "ទូកចូលរួមសរុប៣៩០ ទូក ក្នុងសេនាះ ទូកអុំបុរស ២៥៧, ទូកចែវបុរស ៤១, ទូកអុំនារី ១, ទូក ចែវនារី ២, ទូកខ្ទាត អន្តរជាតិ ៨៩ ទូក, ទូកបុរស ៨៥ ទូក និង ទូកនារី ៤ ទូក ។



កីឡាករប្រណាំងទូកសរុប ២៥៣០៩ នាក់ កម្លាំងត្រៀមបុរស ៤៣២៩ នាក់, នារី ២២០ នាក់ ។

ព្រះរាជពិធីបុណ្យអុំទូក រយៈពេល៣ថ្ងៃនេះ បានប្រព្រឹត្តទៅយ៉ាងរលូន ៕



(តមកពីទំព័រទី ០៣) **ចំណាប់អារម្មណ៍ទៅលើបញ្ហា...**

**របបគ្រប់គ្រងខ្មែរក្រហមសង្គ្រោះជាតិ ៧ មករា ១៩៧៩**

នៅចុងខែធ្នូ ឆ្នាំ ១៩៧៨ ស្រាប់តែមានកងកម្លាំងទ័ពយួនសង្គមនិយមវៀតណាម ប្រមាណពីរសែន (២០០,០០០) នាក់ រួមទាំងទីប្រឹក្សា និងអ្នកជំនាញការរាប់ពាន់នាក់ មានអាវុធយុទ្ធោបករណ៍ គ្រប់ធុនបានបើកយុទ្ធនាការវាយលុកលុយសំរុកចូលកំទេចកំចាត់ខ្មែរក្រហមយៀកមិញកម្ពុជាប្រជាធិបតេយ្យ ដោយយកលេសចោទថាជាក្រុមដឹកនាំជាឃាដករប្រល័យពូជសាសន៍ ត្រូវតែកំទេចកំចាត់ចេញឱ្យអស់រលីងពីលើទឹកដីខ្មែរជាដាច់ខាត ។ តែក្នុងរយៈពេល៣សប្ដាហ៍តែប៉ុណ្ណោះ ជោគជ័យក្ដោបក្ដាប់អំណាចត្រូវបានធ្លាក់នៅក្នុងកណ្ដាប់ដៃកងទ័ពមហាមិត្តយួនសង្គមនិយមទាំងស្រុងរួចហើយត្រូវតែបន្តុបក្រុមមេដឹកនាំខ្មែរ ដែលកងទ័ពយួនដង្ហែរតាមក្រោយរថក្រោះមកឱ្យចូលកាន់អំណាចជាមេដឹកនាំគ្រប់គ្រង ហើយប្រកាសយកថ្ងៃទី ៧ ខែមករា ឆ្នាំ ១៩៧៩ ទុកជាថ្ងៃមហាជោគជ័យរហូតមកដែរ ។

ដោយសារតែមើលឃើញមហាគ្រោះថ្នាក់ជាមហន្តរាយធំណាស់ដល់វាសនាប្រទេសជាតិមាតុភូមិ និងកុលបុត្រ កុលធីតា នាបច្ចុប្បន្នកាល និងទៅអនាគតកាល ទើបបណ្ដាលឱ្យមានចលនាអ្នកតស៊ូស្នេហាជាតិងើបក្រោកឈរឡើងប្រឆាំងទាមទារតវ៉ាបណ្ដេញឱ្យកងទ័ពយួនសង្គមនិយមដកចេញពីប្រទេសខ្មែរទៅវិញ ហើយទុកឱ្យប្រជាពលរដ្ឋខ្មែរ រៀបចំការគ្រប់គ្រងដឹកនាំទៅតាមគោលការណ៍លទ្ធិប្រជាធិបតេយ្យពិតប្រាកដឡើងវិញ ។

ប៉ុន្តែ ទោះបីជាយ៉ាងណាក៏ដោយក្រុមមេដឹកនាំបន្តុបឡើងដោយយួន គេពុំអាចព្រមទទួលយកការប្រឆាំងទាមទារនោះបានទេ គេត្រូវតែប្ដូរយុទ្ធសាស្ត្រថ្មីដោយធ្វើជាបើកទ្វារប្រទេសខ្មែរឱ្យប្រទេសលោកសេរីប្រជាធិបតេយ្យចូលទៅពិនិត្យមើល និងតាមដានគ្រប់គ្រងដឹកនាំ និងសុំឱ្យជួយផ្ដល់ជំនួយឱ្យបានច្រើនជាអតិបរមា ។ ជាមួយគ្នានេះដែរ មានការប្រើយុទ្ធវិធីដោយសម្ងាត់ក៏មានដោយចំហក៏មាន ដើម្បីបង្ក្រាបទៅលើគណបក្សប្រឆាំង និងសកម្មជនបញ្ហាវន្តណា ដែលប៉ុនប៉ងផ្ដួលរំលំអំណាចផ្ដាច់ការ និងអយុត្តិធមិ ក្នុងសម័យនេះ ។

សរុបសេចក្ដីទៅរបបគ្រប់គ្រងនៅលើប្រទេសខ្មែរកម្ពុជា ចាប់តាំងពីឆ្នាំ១៩៧៥ឃើញថា ជារបបកុម្មុយនីស្ដដ៏ចំឡែកមួយ ដែលសន្តិភាពក្ដី ការរីកចំរើនលូតលាស់គ្រប់វិស័យក្ដី គឺសុទ្ធតែចេញមកពីស្នាដៃមហាមិត្តយួនមុនឆ្នាំទាំងអស់រដ្ឋាភិបាលខ្មែរ គ្រាន់តែជាឧបករណ៍ដ៏សំខាន់មួយសំរាប់បិទបាំងកលល្បិចពុតត្បុតរបស់យួនសង្គមនិយមតែប៉ុណ្ណោះ ៕

នាទីប្រវត្តិសាស្ត្រ

# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន (តពីលេខមុន)**

**- ២០ សីហា** : ផ្ដើមបេសកកម្មចិនឡាទីពីរ ដើម្បីបើកផ្លូវជាតិលេខ ៦ ពីភ្នំពេញទៅកំពង់ធំ ដោយយោធា លន់ នល់ - ខាង PCK កែពក វាយបានបារ៉ាយ ហើយកាន់កាប់មួយរយៈ មានការផ្ដើមសម្លាប់រង្គាលជាលើកដំបូងបង្អស់ ពុំដែលមានតាំងពី ១០ឆ្នាំមកហើយ ប្រជាពលរដ្ឋ ដែលបានផ្ដល់ជំរកឱ្យពួកយោធាវៀតណាមពីមុនមកត្រូវសម្លាប់ទាំងអស់- រណ្ដៅសាកសព ១៨០នាក់ ត្រូវបានរកឃើញដោយយោធា លន់ នល់ នៅពេលយកបារ៉ាយបានមកវិញ ។

**- ៣០ កញ្ញា** : សន្និបាតបក្សកុម្មុយនិស្តខ្មែរលើកទី៣ ប្រកាស "សត្រូវដ៏គ្រោះថ្នាក់ គឺ វៀតណាម" - អត្ថបទ " ថ្លែងការណ៍របស់បញ្ញាវន្តស្នេហាជាតិនៅតំបន់រំដោះ " ត្រូវបានផ្សព្វផ្សាយពេញសកលលោក - ពួកខ្មែរ ហាណូយ ត្រូវបានផ្ដើមចេញពីតួនាទីទទួលខុសត្រូវ - សាឡុតស ត្រូវបានជ្រើសតាំងជាអគ្គលេខាបក្ស និងជាប្រធានអង្គការយោធា ។

**- ១៦ តុលា** : ប្រកាសរបស់ប្រមុខរដ្ឋប្ដូរសភាធម្មនុញ្ញទៅជាសភាជាតិ ដែលបានតែងតាំងពីឆ្នាំ ១៩៦៦ - ពេលនេះត្រូវបានផុតអាណត្តិ ។

**- ២០ តុលា** : ប្រកាសសាជាថ្មីនូវភាព "ប្រទេសមានអាសន្ន" - រដ្ឋាភិបាលប្រើសកម្មភាពចេញជាប្រកាស - សិទ្ធិជាឯកជនរបស់ពលរដ្ឋត្រូវកំរិតសាជាថ្មី ជាពិសេស ការចាប់ខ្លួន និងការដាក់ពន្ធនាគារដោយគ្មានជំនុំជំរះ ។

**- ៣ ធ្នូ** : បញ្ចប់បេសកកម្មចិនឡាទីពីរ បាក់កងទ័ពទាំងមូល គឺជាបេសកកម្មយោធាធំជាងគេចុងក្រោយបង្អស់របស់សាធារណរដ្ឋខ្មែរ ។

**- ១៧ ធ្នូ** : សិទ្ធិសេរីភាពនៃជនស៊ីវិល និងសិទ្ធិធ្វើនយោបាយត្រូវលប់ចោល ។

**២០ មីនា** : តែងតាំងរដ្ឋាភិបាល សឺង ង៉ុកថាញ់

**៣-រដ្ឋាភិបាល សឺង ង៉ុកថាញ់ (២០.៣.១៩៧២-១៤.១០.១៩៧២)**

. នាយករដ្ឋមន្ត្រី និងរដ្ឋមន្ត្រីការបរទេស : សឺង ង៉ុកថាញ់

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកយុត្តិធម៌-សុខាភិបាល សុខមាលភាព និងអភិវឌ្ឍន៍ផលិតផលឱសថ : យ៉ែម សំបូរ

. ទេសរដ្ឋមន្ត្រីអមទីស្ដីការប្រធានាធិបតីសាធារណរដ្ឋ : ម៉ៅ សាយ

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកការពារជាតិ : សាក់ ស៊ុតសាខន

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកផែនការ-ជំនួយក្រៅប្រទេស និងអភិវឌ្ឍន៍ : ផ្ញែក ឆាក

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកមហាផ្ទៃ-ធម្មការ-សន្តិសុខជាតិ អតីតយុទ្ធជន-ទេសចរណ៍ : ប៉ាប នាងិន

. រដ្ឋមន្ត្រីពត៌មាន : ឡុង បូរ៉េត

. រដ្ឋមន្ត្រីការងារ និងសង្គមកិច្ច : ចៅ សេងអ្វ

. រដ្ឋមន្ត្រីឧស្សាហកម្ម-ធនធានរ៉ែ និងនេសាទសមុទ្រ : ឆន សុខុម

. រដ្ឋមន្ត្រីពាណិជ្ជកម្ម : កង កេង

. រដ្ឋមន្ត្រីទទួលបន្ទុកកំណែនទូទៅ : អ៊ុន ត្រមុជ

. រដ្ឋមន្ត្រីកសិកម្ម-អភិវឌ្ឍន៍សហគមន៍ និងទេពកោសល្យជនបទ : ស សុង

. រដ្ឋមន្ត្រីលំនៅដ្ឋាន-សាធារណការ-ប្រៃណីយ៍-ទូរគមនាគមន៍ និងដឹកជញ្ជូន : ឃី តាំងលីម

. រដ្ឋមន្ត្រីហិរញ្ញវត្ថុ : អ៊ុត ធុយ

. រដ្ឋមន្ត្រីអប់រំជាតិ និងវប្បធម៌ : ថាច់ ជា

. រដ្ឋមន្ត្រីទទួលបន្ទុករដ្ឋបាលក្រុងភ្នំពេញ : អ៊ុង ហៀម

**- ថ្ងៃ ២៣ មីនា** : រៀបចំរដ្ឋាភិបាលថ្មីរបស់ GRUNK រដ្ឋាភិបាលរណសិរ្សរំដោះជាតិកម្ពុជា ដែលផ្ដល់ផលចំណេញឱ្យចរន្តកុម្មុយនិស្ត PCK ។

**.រ.រ.រ.ជ.ក. បានប្ដូរសមាសភាពនៅថ្ងៃ២០ សីហា ១៩៧០ - ថ្ងៃ ២៣ មីនា ១៩៧២ និងនៅថ្ងៃ ៣ ធ្នូ ១៩៧៣ ។ ខាងក្រោមនេះ គឺជាសមាសភាព .រ.រ.រ .ជ.ក. នៅថ្ងៃ ២ ធ្នូ ១៩៧៣ :**

. នាយករដ្ឋមន្ត្រី : ប៉ែន នុត

. ឧបនាយករដ្ឋមន្ត្រី- រដ្ឋមន្ត្រីការពារជាតិ : ខៀវ សំផន

. រដ្ឋមន្ត្រីប្រតិភូអមទីស្ដីការនាយករដ្ឋមន្ត្រី : គាត ឆុន

. រដ្ឋមន្ត្រីការបរទេស : សារិន ឆាក

. រដ្ឋមន្ត្រីពត៌មាន : ហ៊ូ នឹម

. រដ្ឋមន្ត្រីមហាផ្ទៃ : ហ៊ូ យន់

. រដ្ឋមន្ត្រីសេដ្ឋកិច្ច : ជួន ម៉ុម

. រដ្ឋមន្ត្រីបេសកកម្មពិសេស : ចៅ សេង

. រដ្ឋមន្ត្រីខាងសំរបសំរួល : ជួន ប្រសិទ្ធ

. រដ្ឋមន្ត្រីអប់រំ : ខៀវ ធីរិទ្ធ

. រដ្ឋមន្ត្រីអាវុធយុទ្ធភ័ណ្ឌ : ឌួង សំអុល

. រដ្ឋមន្ត្រីយុត្តិធម៌ : នរោត្តម ភូរីស្សារ៉ា

. រដ្ឋមន្ត្រីសាធារណការ និងទូរគមនាគមន៍ : ទូច ភឿន

. រដ្ឋមន្ត្រីសុខាភិបាល : ជួន ជឿន

. រដ្ឋមន្ត្រីកិច្ចការសាសនា និងសង្គម : ជូ ជេត

**- ខែមេសា** : កងទ័ពរណសិរ្សវាយយកបានកំពង់ត្របែក ដែលជាចំណុចយុទ្ធសាស្ត្រយោធាដ៏សំខាន់នៅលើផ្លូវទៅព្រៃនគរ ។

**- ថ្ងៃ ២៦-២៧ មេសា** : បាតុកម្មទូទាំងប្រទេសរបស់និស្សិត ដឹកនាំដោយ អ៊ុម យូហៃ បានសំដែងការខកចិត្តចំពោះរបបសាធារណរដ្ឋ ដែលកងប៉ូលិសយោធាក្រោមបញ្ជាលោក សឺង ង៉ុកថាញ់ បានបាញ់និស្សិតនៅមុខសាលាច្បាប់ ធ្វើឱ្យស្លាប់ និងរបួសជាង ៣០ នាក់ យុវជនរាប់រយនាក់ បានរត់ទៅចូលចលនារណសិរ្ស រំដោះជាតិ FUNK.

**- ៣០ មេសា** : ប្រជាមតិ រៀបចំក្នុងតំបន់គ្រប់គ្រងដោយរដ្ឋាភិបាលសាធារណរដ្ឋ បានផ្ដល់សម្លេងភាគច្រើនគាំទ្ររដ្ឋធម្មនុញ្ញថ្មី និងផ្ដល់ភាពស្របច្បាប់ឱ្យរដ្ឋាភិបាល លន់ នល់ ។

**១០ ឧសភា** : ដាក់រដ្ឋធម្មនុញ្ញថ្មីឱ្យប្រើ- ទ្រង់ស៊ីសុវត្ថិ សិរិមតៈ បានទទួលការតែងតាំងឱ្យធ្វើជាទីប្រឹក្សាពិសេសរបស់ប្រមុខរដ្ឋ ។

**តទៅលេខក្រោយ**

# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni

❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា

❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី

❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី

❖ បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

❖ Original Illuatration and Naration in Thai by Gunapayuta.

❖ Translation into English by A Lu.

❖ Coloring by Yann Fang Lee

❖ Translation into Khmer by Bhikkhu Kong Am.

**៣៩-** ពេលវេលាចេះតែកន្លងផុតទៅយ៉ាងលឿន ព្រះសិទ្ធត្ថកុមារទ្រង់ក៏មានវ័យចំរើនឡើងពេញរូបពេញរាង ។ គ្រប់គ្រឿងគំសាន្តទាំងឡាយ ដែលព្រះវរបិតាទ្រង់បានប្រទានដល់ព្រះអង្គអង្គទាំងអស់ គួរតែធ្វើឱ្យបុត្របានសប្បាយ តឡូវអ្វី១សព្វយ៉ាងប្រែជាអសារឥតការទៅវិញ ។

**៤០-** ក្រោយមកព្រះមហាក្សត្របានកោះប្រជុំរដ្ឋមន្ត្រីទាំងឡាយ ដើម្បីស្នើសុំយោបល់ក្រែងមានមធ្យោបាយអ្វីផ្សេងទៀត ដើម្បីទប់ស្កាត់កុំឱ្យព្រះរាជបុត្រលះបង់តួនាទីជាអ្នកដឹកនាំដ៏មានសក្ដានុពលក្នុងព្រះនគរ ទៅធ្វើជាសាស្ដាចារ្យខាងសាសនា ដូចដែលឥសីតាបសបានព្យាករណ៍ទុកមកនោះ ។ រដ្ឋមន្ត្រីទាំងឡាយបានទទួលថ្វាយយោបល់ថា " បពិត្រមហារាជមធ្យោបាយល្អបំផុត ដើម្បីចងរឹតព្រះរាជកុមារ គឺមានតែរកនារីដែលមានរូបឆោមល្អជាងគេ ក្នុងព្រះនគរមករៀបអភិសេកថ្វាយព្រះរាជកុមារ តែម្យ៉ាងប៉ុណ្ណោះទេ ក្រាបទូល ។ កាលណាព្រះកុមារជាម្ចាស់ទ្រង់បានទទួលនូវរសជាតិផ្អែមល្ហែមនៃជីវិតប្ដីប្រពន្ធហើយនោះ ព្រះអង្គទ្រង់នឹងមិនរើសរកអ្វីផ្សេងទៀតឡើយ ។ ពេលនោះ ព្រះបំណងព្រះមហារាជនឹងបានសំរេច ហើយព្រះរាជកុមារពិតជាទ្រង់ទទួលស្នងរាជសម្បត្តិគ្រប់គ្រងព្រះនគរតទៅអនាគតជាក់ជាមិនខាន់ ។ **(តទៅលេខក្រោយ)**

39- The year went by very quickly, and the Prince Siddhartha had now become a youngman. All the material pleasures the King had bestowed on him turnet out to be valueless to the contermplative prince. The King had thought that his actions would make the prince happy, but everything proved to be in vain.

40- He then summoned his ministers to a meeting, asking them if there were any other means to prevent the Prince from abandoning his position as potential leader of the Country to become a religious teacher as the old sage Asita had pridiicted. The officials affered their opinion; The best way hold the prince is to seek out the most beautiful girl in the land land and have the prine get married her. Once the prince has experienced the sweetness of married life, he will choose nothing else. Then he will follow your intention and take over the troune in the futhure.

( Continued Issue After )

# ឆ្លើយតបសំនួរមិត្តអ្នកអាន



●●●មានមិត្តអ្នកអានមួយចំនួនបានដឹងថាខ្ញុំ មានអាយុ៧០ឆ្នាំទៅហើយនៅខំប្រឹងស្វាយសំពាតទៅសាលាសារជាថ្មីវិញ ធ្វើឱ្យគាត់ឆ្ងល់យ៉ាងខ្លាំង ។ ទៅរៀនអី ? ដើម្បីធ្វើអីទៀតបើចំណាស់វ័យទៅព្រេចទៅហើយនោះ! ។ អស់លោកឆ្ងល់យ៉ាងនោះក៏សមដែរ ព្រោះភាគច្រើនតែងតែយល់គ្រប់ៗគ្នាថា ទៅរៀនមានបំណងតែម្យ៉ាងគត់ គឺរៀនឱ្យបានកន្លែងមួយសម្រាប់ធ្វើការដើម្បីមានមុខមានមាត់ បានស្រណុកស្រួលខ្លួនទៅថ្ងៃក្រោយ ។ ទៅរៀនគ្មានប្រយោជន៍អ្វីក្រៅពីប៉ុណ្ណឹង ហេតុនេះទៅរៀនធ្វើអីទៀតបើអាយុ៧០ឆ្នាំទៅហើយ កៅអីនៅឯណា ? ការិយាល័យណាគេនឹងទទួលទៀត ? មកពីភាគច្រើនយល់យ៉ាងនេះ ទើបគាត់ច្រើនតែបិទទ្វាររហូត បើក្មេងណាម្នាក់បានឈប់រៀនហើយមិនដែលបានគិតណែនាំឱ្យ គ្នាត្រឡប់ទៅរៀនឡើងវិញសោះឡើយ ។

ការពិតទៅរៀនមានប្រយោជន៍ច្រើនយ៉ាងណាស់ រៀនបានភាសាមួយដូចសម្រេចបានឈានមួយក្នុងសមាធិកម្មដ្ឋានយ៉ាងអញ្ចឹង គឺយើងអាចបើកមើលឃើញអ្វីៗដែលជនជាតិគេទាំនោះប្រើភាសា ឬអក្សរសាស្ត្ររបស់គេសម្រាប់ស្រាវជ្រាវរុករកនូវអ្វីៗដែលគេចង់ដឹងចង់ឮបើរៀនខាងមុខវិជ្ជាផ្សេងៗវិញ យើងនឹងចេះបាននូវមុខវិជ្ជាទាំងនោះ វាមានប្រយោជន៍ឱ្យខ្លួនយើងជាពិតប្រាកដ ។ បើកូនអ្នកស្រែបានរៀនសូត្រខ្លះៗត្រឡប់មកធ្វើស្រែវិញក៏បានប្រសើរជាងឪពុកម្តាយខ្លួន ដែលមិនបានរៀនសូត្រសោះនោះដែរ ហើយវាអាចអនុវត្តន៍សម្រាប់បានគ្រប់មុខរបរដទៃទៀតយ៉ាងនោះដែរ គឺ ថាបើបានទៅរៀនសាលាខ្លះៗមុខរបរដែលយើងធ្វើនោះនឹងបានប្រសើរជាងអ្នកមិនបានទៅសាលារៀនសោះ ។ ហើយបើយើងបានរៀនយកបានភាសាណាមួយទៀតនោះ ប្រយោជន៍នឹងហុចមកឱ្យយើងកាន់តែធំធេងប្រពៃខ្លាំងណាស់ ។ ពិសេសយើងមិនចេះភាសាអង់គ្លេស ឬអេសប៉ាញ៉ុលសោះ ហើយយើងកំពុងរស់នៅក្នុងសហរដ្ឋនេះពិតជាពិបាកខ្លាំងណាស់ ។ ខ្ញុំសុំយករឿងខ្ញុំមកជូនជ្រាបចុះកាលពីមុនមកខ្ញុំបានរៀនចប់មហាវិទ្យាល័យនៅស្រុកខ្មែរដែរហើយ តែមិនសូវបានចេះអង់គ្លេសមកដល់ស្រុកនេះខ្ញុំហាក់ដូចងងឹតឈឹងមើលអីសឹងមិនយល់ខ្ញុំឃើញមានឡានមួយនឹងយន្តហោះមួយគ្រឿងធំចតចំពីមុខឡាន (កាសែត) មានចំណងជើងដែរតែខ្ញុំពុំយល់ច្បាស់ក៏ស្មានថា ឡាននោះរត់ទៅបុកកបាល់ហោះ ។ តែគេចេះភាសាប្រាកដគេបកមកប្រាប់ខ្ញុំថា មានពួកភេរវកម្មត្រូវឃាត់ខ្លួនបាននៅលើយន្តហោះឯឡាននេះគេបើកសំដៅទៅដឹកយកពួកភេរវកម្មទៅចាត់ការតាមច្បាប់ ។ រឿងមួយទៀត គឺរឿងទូរទស្សន៍ដំបូងមិនទាន់ទៅរៀនខ្ញុំមើលទូរទស្សន៍យល់តែតាមចិត្តខ្ញុំ ខ្ញុំអន់ចិត្តសំបើមណាស់ពេលមើលកម្មវិធីមួយគេផ្សាយទាំងយប់ទាំងថ្ងៃឃើញបុរសម្នាក់រូបស្អាតដេកឱបរឹតនារីម្នាក់នៅលើគ្រែពូកយ៉ាងស្អាតប្រណិត ហើយគេថែមទាំងបញ្ជាំងឱ្យឃើញ "រ៉េសសរ" ក្រោមពូកនោះ រំជួយយ៉ាងញាប់រន្ថើនទៀតផង ។ ខ្ញុំអន់ចិត្តនឹងកម្មវិធីដែលយករឿងអាសអាភាសមកបញ្ចាំឱ្យមើលតែគេអ្នកចេះភាសា គេបកប្រែឱ្យទើបយល់ថាគេផ្សាយពាណិជ្ជកម្មលក់ពូកសោះ! ឯងទៅយល់ថា អាក្រក់តែម្នាក់ឯងសោះនេះបានសមថា " ភ្នែកខ្វាក់ត្រចៀកថ្លង់ ទាំងអត់ខ្វាក់អត់ថ្លង់តែម្តង" ។ ឥឡូវនេះ ចូលរៀនបានជាងមួយត្រីមាសខ្ញុំអាចយល់បានច្រើន ។ មានរឿងមួយចំនួនមានអត្ថន័យមានទឹកដមដ៏ពិរោះខ្ញុំបានសន្យាថានឹងនិទានជូនអស់លោកអ្នកអានស្តាប់ជាលំដាប់លំដោយនៅក្នុងទំព័រនាទីស្វែងយល់ពីវប្បធម៌បរទេស ។

ដើម្បីបញ្ចប់ជំពូកដំបូងនៃរឿងនេះ ខ្ញុំសូមជូននូវរឿងមួយដែលខ្ញុំទើបបានដឹងថ្មីៗនេះ ដោយសារតែខ្ញុំបានទៅសាលារៀន ហើយរៀនពីចំណេះខាងស្តាប់ និងសន្ទនា (Speaking and Listening) តាមសៀវភៅមួយដែលមានឈ្មោះថា Talking Through ។ តាមសៀវភៅនោះ អ្នកនិពន្ធ ឈ្មោះ Stephen Budiansky, បានសរសេរនៅក្នុងអត្ថបទចំណងជើង "Truth about dogs ," The Atlantic Montly (July 1999) បានឱ្យស្ថិតិពីការចិញ្ចឹមសត្វកំសាន្តដែលគេហៅថា Pets នោះគ្រាន់តែការចំណាយលើការចិញ្ចឹមឆ្កែមួយមុខប៉ុណ្ណោះសហរដ្ឋអាមេរិកទាំងមូលត្រូវចំណាយលើចំណី : ជាង៥កោដិដុល្លារ- លើថ្លៃព្យាបាលពីគ្រូពេទ្យសត្វ : ជាង៧កោដិដុល្លារ- ក្រុមធានារ៉ាប់រងបានចំណាយលើសំណងទៅលើអ្នករងគ្រោះដោយឆ្កែខាំអស់ : ២៥០លានដុល្លារ បូកបន្ថែមករណីផ្សេងៗទៀត អំពីឆ្កែសាហាវនេះ អ្នកជំនាញខាងផ្នែកស្ថិតិបានឱ្យដឹងថា ការចំណាយគ្រាន់តែទៅលើផ្នែកឆ្កែសាវនេះអស់ : ១កោដិដុល្លារដែរ ។ នេះជាការចំណាយប្រចាំតែឆ្នាំ១៩៩៩ប៉ុណ្ណោះ។

**សូមរង់ចាំអានជាបន្តទៀត**




# សំណោកថ្ងៃទី៩វិច្ឆិកាឆ្នាំ១៩៥៣ (ឯករាជ្យជាតិ)

**ដោយ : ម៉ម យ៉ឺន**

ប្រាំបួនវិច្ឆិកា ហាសិបបី　　ជាតិខ្មែរជោគជ័យបានឯករាជ្យ
រួចពីទុក្ខទោសបានអំណាច　　សិទ្ធិអង់អាចខ្មែរអ្នកជា ។
ប្រាំបួនវិច្ឆិកា ហាសិបបី　　ជាតិខ្មែរប្រុសស្រីគ្រប់រូបា
សប្បាយរីករាយយ៉ាងអស្ចារ្យ　　រួបរួមសាមគ្គីខ្មែរតែមួយ ។
ប្រាំបួនវិច្ឆិកា ហាសិបបី　　ជាតិខ្មែរអរក្រៃខំលើកស្ទួយ
ជាតិខ្មែរអ្នកជាផុតទុក្ខព្រួយ　　តាំងចិត្តរួមជួយពង្រឹងជាតិ ។
៩ វិច្ឆិកា ៥៣　　ជាតិខ្មែរប្រពៃចិត្តល្អស្អាត
ខិតខំប្រឹងប្រែងដោយសង្ខាត　　តាំងចិត្តឱ្យហ៊ានទ្រឯករាជ្យ ។
ប្រាំបួនវិច្ឆិកា ហាសិបបី　　ជាតិខ្មែររួមដៃចិត្តអង់អាច
រួមគ្នាធ្វើបុណ្យថ្ងៃល្អផ្តាច់　　ជាថ្ងៃសម្រេចជោគជ័យា ។
ប្រាំបួនវិច្ឆិកា ហាសិបបី　　ជាតិខ្មែរលើកដៃតាំងសច្ចា
សូមឯករាជ្យខ្មែរមានវាសនា　　គង់វង្សគ្រប់គ្រាតរៀងទៅ ។
៩ វិច្ឆិកា ៥៣　　ជាតិខ្មែរសព្វថ្ងៃស្តាយពេកក្រៃ
មិនគួរឯករាជ្យមិនគង់នៅ　　ដោយសារសត្រូវចូលរុករាន ។
ឱឯករាជ្យអើយជាតិខ្មែរស្តាយ　　ស្រណោះពេកក្រៃពុំនឹកស្មាន
ថាថ្ងៃបាត់អត្តសញ្ញាណ　　ជាខ្មែរគ្រប់ប្រាណដូច្នេះឡើយ ។
ឯករាជ្យជាតិខ្មែរសព្វថ្ងៃនេះ　　បានស្លាប់របេះបាត់ទៅហើយ
ឯករាជ្យក្លែងក្លាយទេខ្មែរអើយ　　ខ្មែរទុក្ខឥតស្បើយមួយជីវិត ។
ប្រាំបួនវិច្ឆិកា សូន្យប្រាំបួន　　ជាតិខ្មែរតាំងខ្លួនត្រួតពិនិត្យ
ជាថ្ងៃជាតិខ្មែរត្រូវតាំងចិត្ត　　រួមសាមគ្គីពិតខ្មែរតែមួយ ។
ប្រាំបួនវិច្ឆិកា សូន្យប្រាំបួន　　ពួកខ្មែរស្នេហ៍យួនគ្មានគិតព្រួយ
ដោយសារជាតិយួនបានមកជួយ　　តែងតាំងលើកស្ទួយឱ្យធ្វើធំ ។
៩ វិច្ឆិកា ០៩　　ក្រុមខ្មែរលក់ខ្លួនពួនសំងំ
គិតថាក្រុមអញក្រុមឧត្តម　　ខ្មែរណាសើចយំអញមិនខ្វល់ ។
ធ្វើបុណ្យឯករាជ្យថ្ងៃប្រាំបួន　　សូន្យប្រាំបួនស្ងួនគ្មានអំពល់
ថ្ងៃបុណ្យឯករាជ្យល្អសែនសល់　　គឺថ្ងៃយួនផ្តល់ប្រាំពីរមករា ។
ឯករាជ្យនាថ្ងៃទីប្រាំបួន　　វិច្ឆិកាគ្មានក្បួនគ្មានបានការ
តាមពិតជាថ្ងៃយួនប្តេជ្ញា　　រំលាយខ្មែរជាឱ្យអស់ស្រុក ។
ឱជាតិខ្មែរអើយត្រូវសោកស្តាយ　　ឯករាជ្យពណ្ណរាយខ្មែរចាំទុក
៩ វិច្ឆិកាខ្មែរចេញមុខ　　មិនត្រូវសំកុកមើលមេក្បត់ ។
ជាតិខ្មែរត្រូវយល់ពីល្បិចកល់　　ជាតិផ្សេងបានផ្តល់ឱ្យខ្មែរព្រាត់
ខ្មែរបែកខ្ញាត់ខ្ចាយនាំគ្នារត់　　គ្មានពេលកំណត់ព្រាត់សូន្យបង់ ។
ឯករាជ្យនាថ្ងៃទីប្រាំបួន　　វិច្ឆិកាបានសូន្យខ្មែរត្រូវផ្ចង់
ស្មារតីរឹងមាំជួយទ្រទ្រង់　　ការពារឱ្យគង់ឯករាជ្យពិត ។
៩ វិច្ឆិកា ៥៣　　ខ្មែរទាំងប្រុសស្រីត្រូវរួមចិត្ត
ការពារឯករាជ្យខ្មែរពិសិដ្ឋ　　ទើបជួយជីវិតខ្មែររស់វិញអើយ ៕

# ហោរាសាស្ត្រប្រចាំថ្ងៃទី ១៣ - ២៦ ខែ ធ្នូ



### ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយក៏ អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្ដាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ព្រោះអាចរកផលកម្រៃបានច្រើនត្រឡប់ចូលផ្ទះ ៕



### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះអ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺមុននឹងហាមាត់និយាយស្ដីអ្វីត្រូវចេះប្រយ័ត្នប្រយែងក្រែងមានពាក្យសម្ដីភ្លាំងភ្លាត់ប៉ះសិទ្ធិអ្នកដទៃអាចបង្កជារឿងទំនាស់ឥតប្រយោជន៍ ។ ចំពោះស្ត្រីភេទ ក្នុងរយៈពេលនេះ មិនត្រូវដើរផ្លូវឆ្ងាយដាច់សង្វែងតែម្នាក់ឯងឡើយ ៕



### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាក១ច្រើន ។ ក្នុងរយៈពេលនេះ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះកម្មករសំណង់ដែលប្រកបការងារនៅតាមទីខ្ពស់ទាប ចូរប្រយ័ត្នប្រយែងក្រែងជួបគ្រោះថ្នាក់ឈានដល់ការរលត់សង្ខារទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនត្រូវឆាប់ត្រចៀកទន់ជឿសម្ដីញុះញង់របស់អ្នកផ្សេងឡើយទើបបានសុខកាយសប្បាយចិត្ត ៕



### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងជម្លោះកើតឡើងចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយា ក្នុងរយៈពេលនេះមានគេអុជអាលឱ្យបែកបាក់ ដូច្នេះគោងប្រយ័ត្នទើបបានសុខ ៕



### ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្ដាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ព្រោះអាចរកផលកម្រៃបានច្រើនត្រឡប់ ចូលផ្ទះ ៕



### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះ បើមានបងប្អូនញាតិមិត្តស្គាល់មកបបួលរកស៊ីចូលហ៊ុនជាមួយគោងចេះត្រិះរិះពិចារណាឱ្យបានល្អិតល្អន់ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ ក្នុងរយៈពេលនេះប្រសិនបើបានស្គាល់ចិត្តថ្មើមគ្នា ហើយគឺអាចគិតគូររឿងអាពាហ៍ពិពាហ៍បាន ៕



### ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺនៅពេលទូទាត់បញ្ជីប្រាក់កាសផ្សេង១ ចូរប្រយ័ត្នក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យច្រើននឹងអាចកើតមានរឿងក្ដីក្ដាំទៀតផង ។ ចំពោះអាជីវករអ្នករកស៊ីប្ដូរប្រាក់ ឬលក់គ្រឿងអលង្ការចូរមានការប្រយ័ត្នប្រយែងក្រែងមានជនខិលខូចលួចបន្លំភ្នែកស្រស់១ ៕



### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាក១ច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ចជា ពិសេសចំពោះអ្នកជំនួញជួញដូរ មុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើត្រូវចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះរាល់ចង្រៃឧបទ្រពបានលុកលុយចូលក្នុងកិច្ចការងាររកស៊ីដូច្នេះទោះជាបានប្រកបការងារអ្វីក៏ដោយតែងប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕



### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយក៏អាចទទួលផល សម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្ដាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែ ទាំងអស់ ៕



### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន។ ក្នុងរយៈពេលនេះ ដោយសារតែយីអ៊ុនកំពុងតែដាក់ស្រាប់នោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានក្នុងការបណ្ដាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ប្រព្រឹត្តល្បែងស៊ីសងឡើយប្រយ័ត្នភ្លាត់ស្នៀតអាចវិនាសអន្តរាយទ្រព្យអស់រលីងពីខ្លួន ។ ចំពោះគូស្វាមីភរិយា ក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕



### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឱ្យបានត្រជាក់ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះមិនត្រូវនិយាយស្ដីប៉ប៉ាច់ប៉ប៉ោចឥតបានការច្រើនពេកទេ ព្រោះរឿងរ៉ាវផ្សេង១អាចកើតចេញពីពាក្យសម្ដី ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកទីបីចូលជ្រៀតជ្រែកនៅក្នុងគ្រួសារ ៕




**-គ្រឿងផ្សំរូបមន្តទី១** : ប្រទាលកន្ទុយក្រពើ , ខ្ទិះដូង ។

**-គ្រឿងផ្សំរូបមន្តទី២** : ទឹកដោះគោជូរ រសជាតិធម្មជាតិ ។

**-វិធីធ្វើរូបមន្តទី១** : យកប្រទាលកន្ទុយក្រពើ មកបកសំបកចេញ លាងទឹកឱ្យស្អាត ហើយយកទៅក្លាសេឱ្យត្រជាក់ រួចបុកឱ្យម៉ដ្ឋល្អម បន្ទាប់មកយកខ្ទិះដូងដែលក្លាសេត្រជាក់ដែរនោះ លាយបញ្ចូលគ្នាឱ្យសព្វ ហើយលាបត្រង់កន្លែងដែលស្បែកខ្លោចដោយកំដៅថ្ងៃ ទុកចោលរយៈពេល២០នាទី សឹមលាងចេញវិញ ។

**- វិធីធ្វើរូបមន្តទី២** : យកទឹកដោះគោជូរ ដែលក្លាសេ នោះមកលាបត្រង់បរិវេណស្បែកត្រូវកម្ដៅថ្ងៃ ហើយទុកចោលរយៈពេល២០នាទី សឹមលាងចេញវិញ ដើម្បីជួយឱ្យស្បែកដែលប៉ះកម្ដៅថ្ងៃល្អប្រសើរឡើងវិញ ៕

**...ពិតមែនស្បែកស្ត្រីនៅលើរាងកាយទាំងមូលទាមទារឱ្យមានការថែបំប៉នក៏ពិតមែន តែក៏មិនត្រូវការវិធីបំប៉នដូចៗគ្នានោះដែរ នោះក៏ព្រោះថា ស្បែកនៅត្រង់កន្លែងនីមួយៗមានលក្ខណៈខុសៗពីគ្នា ។ សំរាប់ស្បែកនៅត្រង់ដើមទ្រូងស្ត្រី ក្រៅពីត្រូវការនូវភាពសំណើមហើយនោះ វត្ថុដែលស្បែកត្រង់បរិវេណនេះត្រូវការនោះ គឺភាពទន់រលោង និងហាប់ណែន... ។**



## វិធីបំប៉នស្បែកដើមទ្រូង

ដូច្នេះការប៉ូវបំប៉នស្បែកត្រង់ដើមទ្រូង ទើបទាមទារឱ្យប្រើអាស៊ីដតាមធម្មជាតិ និងសារជាតិហ្វ្លូរ៉ូណាយ ដែលមានច្រើនសន្ទឹក សន្ធាប់នៅក្នុងផ្លែក្រូចឆ្មាមកជួយដុសជំរះនៃកោសិកចាស់ដែលជាប់ខ្មៅ ស្ដារស្ថានភាពស្បែកឱ្យស្រស់ថ្លាឡើងវិញ និងលើសពីនេះទៅទៀតនោះ ជួយឱ្យស្បែកបានហាប់ណែនឡើងតំណាលគ្នាទៀតផង ។

ចំពោះវិធីបំប៉នស្បែកដោយប្រើទឹកក្រូចឆ្មា វិញ អាចធ្វើបានដោយងាយៗគ្រាន់តែណែនាំឱ្យច្របាច់ទឹកក្រូចឆ្មារនៅស្រស់ៗរួចយកវាឈ្លី លាបនៅលើស្បែកដើមទ្រូងរៀងរាល់ងូតទឹកនៅពេលល្ងាច។ ប្រសិនបើអ្នកព្យាយាមធ្វើ តាមការណែនាំខាងលើនេះជាប់ទៀងទាត់នោះធានាថា ស្បែកដើមទ្រូងរបស់អ្នកពិតជាស ហើយថែមទាំងហាប់ណែនល្អ មិនចាំបាច់ទៅទិញក្រែមលាបឈ្លីនាំឱ្យខាតបង់ថវិកាអស់ច្រើនដោយឥតប្រយោជន៍នោះទេ ៕

( តមកពីទំព័រទី ០១)

## គាំទ្រពីរដាប់ឆ្នោតទាំងពីរ

សកម្មភាពនយោបាយ ដែលគួរតែជៀសវាង ។ នៅមុនថ្ងៃបោះឆ្នោត១អាទិត្យ សហគមន៍ខ្មែរមួយចំនួន បានប្រកួករកគ្នាទៅជួយឃោសនាបោះឆ្នោតឱ្យបេក្ខជនសម្រាប់មុខងារការពារច្បាប់ដ៏សំខាន់ពីររូប គឺកាលពីថ្ងៃសៅរ៍ ទី៣១ តុលា ក្រុមអតីតយុវជនប្រមាណ២០នាក់ បានចូលរួមការឃោសនាឱ្យ សេត វិលាម (SETH WILLIAMS) ដែលឈរឈ្មោះជាបេក្ខជនមេធាវីរបស់ក្រុង ( District Attorney) ។ ពួកគាត់មានភាពរីករាយនឹងដង្ហែរក្បួនតែងរថយន្តបង្ហាញមុខបេក្ខជនរបស់គេ ហើយយកអាវពណ៌លឿងជាសញ្ញារបស់ សេត វិលាម មកពាក់គ្រប់គ្នា ។



នៅថ្ងៃទី១ វិច្ឆិកា សហគមន៍ខ្មែរមួយក្រុមទៀត បានជួបជុំគ្នានៅភោជនីយដ្ឋាន គ្លោដិនប៉ាឡេស (Golden Palace) មានគ្នាប្រមាណ ៤០នាក់ នាំគ្នាគាំទ្របេក្ខភាពអាមេរិកាំង ស្ត្រីម្នាក់ដើមកំណើតចិន ឈ្មោះ អាយដា ឆិន (IDA CHAN) អ្នកស្រីមានរូបស្រស់ស្អាត សំដីមុតសង្ហា ក្លាហាន គាត់ឈរឈ្មោះដើម្បីឱ្យពលរដ្ឋបន្តអាណត្តិឱ្យគាត់១០ឆ្នាំថ្មីទៀត ។ អ្នកស្រី អាយដា ឆិន មានកិត្តិសព្ទល្អប្រសើរក្នុងសហ-គមន៍ខ្មែរ ដែលរាត្រីថ្ងៃនោះបានទទួលការគាំទ្រយ៉ាងកក់ក្ដៅពីសហគមន៍ខ្មែរពីថ្នាក់ដឹកនាំ ។

លទ្ធផលដែលទទួលបាននារាត្រីថ្ងៃអង្គារទី៣ វិច្ឆិកា គឺ សេត វិលាម បានទទួលសន្លឹកឆ្នោត ៧៥% លើសគូរប្រជែងរបស់គាត់ រីឯ លោកស្រី អាយដា ឆិន ក៏បានឃើញតំណែងជាចៅក្រមរបស់គាត់ទទួលការបន្ត១០ឆ្នាំទៀត ។



សហគមន៍ខ្មែរ នាសប្ដាហ៍កន្លងទៅនេះបានបង្ហាញស្នាដៃថ្មី គឺពួតកម្លាំងគ្នា ដើម្បីលើកដំកើងបេក្ខជនដ៏មានប្រយោជន៍របស់ខ្លួនឱ្យទៅកាន់អំណាចរដ្ឋប្រជាធិបតេយ្យសហគមន៍ខ្មែរមានសមត្ថភាពគ្រប់គ្រាន់ថា ខ្លួនអាចធ្វើការលើកដំកើងនេះបាន ដោយធ្វើនយោបាយរបៀបនេះ គ្មានអ្វីខុសបន្តិចសោះ ៕

(តមកពីទំព័រទី ០៦)

# ស្វែងរកការរំដោះតាមមាត៌ារបស់

ចំណែករូបខ្ញុំ អ្វីទាំងនោះពុំមានកើតទេ ក៏ប៉ុន្តែអង្គុយរួមថ្ងៃនេះ មានភាពស្ទះស្អាប់ គ្មានខ្យល់ដកដង្ហើមធ្វើឱ្យខ្ញុំស្ទះខ្យល់ចេញចូលច្រមុះ ទោះជាខំបើកភ្នែក ហើយក៏ដោយ ដល់បិទមកវិញ អារម្មណ៍ស្ទះខ្យល់មកវិញដដែល... ថ្ងៃនោះខ្ញុំពុំអាចប្រមូលអារម្មណ៍ ដើម្បីពិនិត្យសព្វសារពាង្គកាយដូចដែលកម្មវិធីវិប្បសនាចង់ឱ្យសិស្សទទួលនោះបានទេ ដោយសារតែភាពស្ទះខ្យល់របស់ខ្ញុំតែម្នាក់ឯងនោះ... ខ្ញុំក៏ងើបចេញមកក្រៅបន្ទប់ ក្រែងទទួលបានខ្យល់ប្រសើរជាងក្នុងបន្ទប់... តែភាពស្ទះខ្យល់នេះ នៅតែពូនខ្ពស់ ឈឺចុកចាប់ពេញដើមទ្រូង សរសៃសាច់ដុំស្មាពើតយ៉ាងតឹង គ្រូបានអនុញ្ញាតឱ្យខ្ញុំទៅសម្រាកនៅក្នុងបន្ទប់វិញ ពេលនោះក្នុងចំណោមសិស្សមានវេជ្ជបណ្ឌិតម្នាក់ បានវាស់ឈាម និងពិនិត្យអាការៈជម្ងឺ ហើយនិយាយថា " ពុំមានសញ្ញានៃការគ្រោះថ្នាក់ណាមួយទេ តែគួរតែទៅពេទ្យជាបន្ទាន់ដែរ ដោយសារមានផ្ទៃពោះ "... ខ្ញុំក៏ត្រូវដឹកទៅមន្ទីរពេទ្យ នារសៀលនោះ ដោយមានប្តីខ្ញុំ និងអ្នកគ្រប់គ្រងមជ្ឈមណ្ឌលជូនដំណើរផង ។

ល្ងាចណាស់ហើយ ខ្ញុំសម្លឹងមើលស្រុកភូមិនៃតំបន់តិចសាស់ មានដីធំៗ ផ្ទះជាអ្នកចំការមួយៗ ដាច់ឆ្ងាយពីគ្នា រថយន្តរត់កាត់គ្នាយូរៗម្តងនាតាមផ្លូវទៅកាន់មន្ទីរពេទ្យ ដែលនៅចម្ងាយប៉ុន្មានកន្លះម៉ោងពីមជ្ឈមណ្ឌល ។ ពេលមកដល់អង្គុយចាំតែបន្តិច ក៏ត្រូវនាំចូលទៅពិនិត្យ និងសួរនាំដោយវេជ្ជបណ្ឌិតប្រចាំការនៅពេទ្យកុហ្វម៉ាន់ គេវាស់កម្លាំងឈាម ស្តាប់បេះដូង សួរពីហេតុផលដែលបណ្តាលឱ្យផ្តើមអាការរោគជម្ងឺរបៀបណា មានគិលានុបដ្ឋានមកជួសឈាមមកយកទឹកនោមទៅពិនិត្យ ហើយរង់ចាំចម្លើយ ។ ពេលនោះអ្វីៗក្នុងខ្លួនពុំមានល្អក់ខ្វល់អ្វីទាំងអស់ ក្រៅពីខ្ញុំគិតជាមួយប្តីខ្ញុំ ពុំដឹងគេយកលុយប៉ុន្មានទេ ពីព្រោះខ្ញុំឥតមានបង់ប្រាក់សម្រាប់ធានាការព្យាបាល (HEALTH INSURANCE) របស់ខ្ញុំនៅឡើយនោះតែប៉ុណ្ណោះ ។ ប្រមាណជាង ១ ម៉ោងក្រោយមក លទ្ធផលនៃការពិនិត្យអាការជម្ងឺមកដល់គ្រូពេទ្យនិយាយថា បេះដូងដើរធម្មតា បើទោះជាសន្ទះក្នុងបេះដូងសំរាប់ទប់ដំណើរឈាមកុំឱ្យធាក់ថយក្រោយ វាអូនថយពីអតីតកាលក៏ពុំមានបង្ហាញការប៉ះពាល់ដំណើរឈាមណាមួយដែរ អ្វីៗមានភាពប្រក្រតីរាប់ទាំងទារកនៅក្នុងផ្ទៃផង ។



ទីលានដីធំទូលាយសម្រាប់ដាក់រថយន្តរបស់សិស្ស និងអគារអង្គុយភាវនាធម៌

ខ្ញុំចេញពីមន្ទីរពេទ្យបួនម៉ោងក្រោយ ដោយគ្មានតែចុះហត្ថលេខាបញ្ជាក់ពីអាស័យដ្ឋាន និងពុំមានប្រាក់បង់នៅពេលភ្លាមនេះ ហើយត្រឡប់មកមជ្ឈមណ្ឌលវិញ ត្រេកអរនឹងដឹងថា ខ្ញុំគ្មានជម្ងឺអ្វីនោះទេ ។

ស្អែកឡើងខ្ញុំបន្តភាវនាដូចធម្មតា ដែលគ្រោងទុកប្រធានស្ត្រីរបស់ខ្ញុំឈ្មោះ សារី រហ័សរហួន ហើយយកចិត្តទុកដាក់នឹងខ្ញុំគ្មានទាស់ គួរឱ្យគោរពណាស់ ខ្ញុំគ្មានខ្វះអ្វីទាំងអស់សម្រាប់ចិញ្ចឹមខ្លួន និងគភ៌របស់ខ្ញុំ ខ្វះតែម្យ៉ាង គឺខ្យល់ដកដង្ហើមនៅតែបន្តស្ទះ នៅពេលខ្ញុំអង្គុយស្ងប់ម្តងៗ ។ ខ្ញុំបន្តសួរសំនួរដដែលនេះទៅរកគ្រូបង្ហាត់ ចម្លើយដដែលបានត្រូវទទួលមកវិញ ឱ្យខ្ញុំបើកភ្នែក ឱ្យខ្ញុំទៅសម្រាក ឱ្យខ្ញុំបន្តដកដង្ហើមធម្មតា ដោយមិនឱ្យខ្វល់ពីរូបភាព ដែលខ្ញុំឃើញក្នុងអារម្មណ៍របស់ខ្ញុំ... ។ល។ ក៏ប៉ុន្តែខ្ញុំមិនចង់អាក់ខានធម្មទេសនារបស់លោកគ្រូគ្គោអិនកា ដែលខ្ញុំមិនបានស្តាប់ល្ងាចមិញពេលខ្ញុំទៅពេទ្យនោះទេ គ្រូបង្ហាត់ក៏បានអនុញ្ញាតឱ្យប្តីខ្ញុំចាក់ CD ធម្មទេសនានោះឡើងវិញ ឱ្យខ្ញុំស្តាប់តែម្នាក់ឯង នារសៀលថ្ងៃទី៦នោះ ។ ខ្ញុំគិតយ៉ាងច្រើនទៅលើសារទាំងអម្បាមាណ ដែលមកពីគ្រូបង្ហាត់ មកពីគ្រូធំ គ្គោអិនកា តែពុំបានជួយអ្វីទេ ទោះជាខ្ញុំជឿពាក្យអ្នកទាំងពីរយ៉ាងស៊ុបប៉ុណ្ណាក៏ដោយ... ដងខ្លួនខ្ញុំតែចាប់ឈឺ ពោះវៀន ពោះតាំងខ្ញុំ ផ្តើមរុញមកលើធ្វើឱ្យដង្ហើមខ្ញុំស្ទះ បង្ខំឱ្យខ្ញុំប្រតិកម្ម ដោយបើកភ្នែក ទើបធ្វើឱ្យដង្ហើមខ្ញុំត្រឡប់មកវិញ ។ ខ្ញុំខ្លាចណាស់ នៅពេលស្ទះខ្យល់ម្តងៗ... ពីព្រោះការស្ទះខ្យល់នេះ ធ្វើឱ្យខ្ញុំសន្លប់បាត់ស្មារតីញយដងរួចមកហើយ ហើយពេលនេះទៀត វានឹងធ្វើឱ្យខ្ញុំដួលសន្លប់ក្នុងសាលាភាវនាដូចពេលមុនៗជាប្រាកដ... ។

ថ្ងៃទី៨ នៃការអង្គុយវិប្បសនាកម្មដ្ឋាន... សារជាច្រើននៃព្រះធម៌ទេសន៍ដោយលោកគ្រូ គ្គោអិនកា ធ្វើឱ្យខ្ញុំពិនិត្យរកឫសគល់នៃវេទនារម្មណ៍ បង្ហាញដោយការឈឺចាប់លើដងខ្លួន ក្នុងសារពាង្គកាយរបស់ខ្ញុំ ដែលខ្ញុំឮថា វាឈ្មោះ សង្ខារា ហើយខ្ញុំបន្តការពិនិត្យរបស់ខ្ញុំបន្តទៅទៀតថា "ការខ្វះខ្យល់ដកដង្ហើមរបស់ខ្ញុំ គឺជាសង្ខារាមួយទៀត ដែលបណ្តាលឱ្យខ្ញុំបើកភ្នែក ដែលជាប្រតិកម្មទប់ស្កាត់កុំឱ្យការសន្លប់វាមកដល់ ហើយករណីនេះ ធ្វើឱ្យខ្ញុំធ្លាប់មានការលំបាកនឹងទ្រាំ ក្នុងខ្លួនជាទីបំផុត..." ក៏ប៉ុន្តែ គ្រូបង្ហាត់បាននិយាយថា " បើទោះជាអ្នកយល់ ថាមានខ្យល់តិច ក៏នៅតែមាន ការដកដង្ហើមដដែល បើមិនដូច្នោះទេ អ្នកស្លាប់បាត់ ទៅហើយ..." ពាក្យនេះបានប្តូរការយល់របស់ខ្ញុំថា "ដង្ហើមខ្ញុំធ្លាប់មានប្រតិកម្មទៅលើការឈឺចាប់ ដែល ជាសង្ខារា ធ្វើឱ្យខ្ញុំចង់ចាំថា តែឈឺរបៀបហ្នឹង ខ្ញុំនឹង បន្ថយដង្ហើមធ្វើឱ្យខ្វះខ្យល់ ខ្ញុំវិលមុខដួលសន្លប់... ដូច្នេះគឺការឈឺចាប់ឯណោះទេ ដែលខ្ញុំត្រូវពិនិត្យ ពុំមែនដង្ហើមទេ ! " ។ ចាប់ពីពេលនោះមក ខ្ញុំចាប់ ផ្តើមពិនិត្យអាការជម្ងឺរបស់ខ្ញុំ វាផ្តើមពីណា ? ទៅដល់ ណាហើយ ? នៅពេលមកដល់ដើមទ្រូងហើយ... តើ ស្មានៅតែចុកទៀតទេ ? បេះដូងខ្ញុំមានការដើរញាប់ ជាងធម្មតាឬទេ ?... មានឈឺត្រង់ណាទៀតទេ ជាមួយ គ្នានេះដែរ ខ្ញុំបានសម្រេចចិត្តថា បើដង្ហើមវាត្រូវស្ទះ ក៏ខ្ញុំមិនខ្វល់នឹងវាដែរ ។ គ្រូខ្ញុំឥតបានឃើញព្រឹត្តការណ៍ នៃការសន្លប់ ដែលខ្ញុំរង់ចាំនោះទេ ដង្ហើមខ្ញុំបានបន្ថយ ការស្ទះខ្លះៗហើយ ហើយខ្ញុំក៏គ្មានអារម្មណ៍ថា ខ្ញុំនឹង សន្លប់បាត់ស្មារតីនៅពេលបន្តិចទៀតនេះដែរ រីឯសង្ខារា វាឡើងមក ខ្ញុំតាមពិនិត្យវាមួយសន្ទុះ ស្រាប់តែ អារម្មណ៍នៃការខ្វះខ្យល់ដកដង្ហើមវាមកដល់តែខ្ញុំនៅ តែពិនិត្យអាការៈឈឺរបស់ខ្ញុំដដែល ដោយលែងយក ចិត្តទុកដាក់នឹងភាពខ្វះខ្យល់ដកដង្ហើមអ្វីទៀតឡើយ ខ្ញុំពុំបានខំប្រឹងនាំយកខ្យល់ក្នុងខ្លួនដូចមុនទេ ហើយ នៅពេលដែលការ ឈឺចុកចាប់របស់ខ្ញុំចុះថយទៅវិញ ទើបខ្ញុំដឹងថា ភាពខ្វះខ្យល់របស់ខ្ញុំ វាឆ្លងទៅផុតមិន ដឹងជានៅពេលណានោះទេ ។

**តទៅលេខក្រោយ**

# សូមអញ្ជើញជួយជាវ

SUBSCRIBE TO

## កាសែតខ្មែរប៉ុស្តិ៍

## THE KHMER POST

និងមានជូនរង្វាន់គាប់ចិត្ត

**And GET a FREE GIFT !**

- ជាវកាសែតនាពេលនេះ លោកអ្នកមានបុព្វសិទ្ធ ពិសេសគឺ
- លោកអ្នកចំណេញពេល ដោយខ្មែរប៉ុស្តិ៍ផ្ញើមកដល់ផ្ទះតែម្តង
- នឹងទទួលបានព័ត៌មានត្រឹមត្រូវមុនគេ ពីតំបន់លោកអ្នក ឬពីតំបន់ផ្សេងៗ ឬពីកម្ពុជា
- ទាញភ្ជាប់គម្លាតខាងភាសា និងវប្បធម៌នៅក្នុងផ្ទះ ដោយសារមានព័ត៌មានខ្មែរ និងអង់គ្លេសពីក្នុង និងក្រៅប្រទេស
- នឹងទទួលបាននូវចំណេះដឹង គំនិតថ្មី ពីការសិក្សា ពីប្រវត្តិសាស្ត្រ ពីសាសនា ពីនយោបាយ..។ល។
- នឹងទទួលបាននូវរង្វាន់ពីខ្មែរប៉ុស្តិ៍ ដូចជា : សៀវភៅ សំរាប់រក្សាក្នុងបណ្ណាល័យ "ទីក្រុងភ្នំពេញមុនឆ្នាំ១៩៥៤"
- នឹងទទួលនូវប័ណ្ណបញ្ចុះតម្លៃធ្វើសក់ នៅហាងសំអាតសក់ Perfect Front ទៀតផង ។

Don't Wait. Subscribe Today ! សូមកុំរារែកអញ្ជើញចុះឈ្មោះជាវថ្ងៃនេះ !

***Please mail me my FREE Gift and the 1 year subscription of the Khmer Post***
*(24 issues for Only $5.00 per month!)*

*I would like to break the payment into these options:*
$30.00 (6 months) ____ $60.00 (1 year)

ថ្ងៃខែ. Today Date......................................................
ឈ្មោះ. Name......................................................
អសយដ្ឋាន. Address......................................................
អ៊ីមែល. Email Address......................................................

**របៀបបង់ថ្លៃ** Payment method : ☐ Money order Check ☐

**សូមផ្ញើតម្លៃជាវមក** ***Please send your payment to :***

***US-Asia Media Group. 438 Lindley Avenue. Philadelphia, Pa 19120***

សូមផ្ញើមកឲ្យខ្ញុំនូវរង្វាន់ដែលភ្ជាប់និងការជាវ "ខ្មែរប៉ុស្តិ៍" ប្រចាំឆ្នាំ (ផ្ញើ២៤លេខ ក្នុងតម្លៃតែ $5/១ខែ)
ខ្ញុំចង់ផ្ញើតម្លៃជាវកាសែតខ្មែរប៉ុស្តិ៍ជា ...$30 (៦ខែ) ឬ ..$60.00 (១ឆ្នាំ)

# តើខ្ញុំអាចសន្សំ 50%* រៀងរាល់ថ្ងៃពុធបានមែនឬ?

ឥឡូវនេះ អ្នកអាចផ្ញើប្រាក់បានកាន់តែងាយស្រួលទៅមនុស្សជាទីស្រឡាញ់របស់អ្នក តាមរយៈសេវាកម្មផ្ទេរប្រាក់រហ័សទាន់ចិត្ត និងគួរឲ្យទុកចិត្តរបស់ Western Union ។ រាល់ការផ្ញើប្រាក់នៅរៀងរាល់ថ្ងៃពុធ អ្នកអាចសន្សំបាន 50% លើថ្លៃសេវាកម្មផ្ទេរប្រាក់ ជាធម្មតាចំនួន 9.99 ដុល្លារ។ នេះជាអត្ថប្រយោជន៍ថ្មីមួយដែល Western Union ផ្តល់ជូនអ្នក និងក្រុមគ្រួសារអ្នក។

Yes!




ផ្ញើប្រាក់ទៅមនុស្សជាទីស្រឡាញ់របស់អ្នកនៅកម្ពុជា

happywednesday

1-800-325 6000

*ប្រាក់កម្រៃសេវាកម្មផ្ទេរប្រាក់ Western Union ក៏អាចប្រែប្រួលដែរ នៅពេលប្រាក់ត្រូវបានប្តូរពីរូបិយប័ណ្ណមួយ ទៅរូបិយប័ណ្ណផ្សេងទៀត។ សេវាកម្មផ្ទេរប្រាក់ក្នុងកម្មវិធីនេះរួមមាន: សេវាកម្មផ្ទេរប្រាក់ភ្លាមៗ សេវាកម្មថ្ងៃបន្ទាប់ សេវាកម្មផ្ទេរប្រាក់ផ្ទាល់ទៅធនាគារ សេវាកម្មបញ្ជូនប្រាក់ទៅផ្ទះនៅពេលយប់ និងសេវាកម្មផ្ទេរប្រាក់របស់ ដែលផ្តល់ជូនសម្រាប់ការផ្ទេរប្រាក់ពីសហរដ្ឋអាមេរិកទៅកាន់ទីកន្លែងផ្សេងៗ។ សេវាកម្មផ្ទេរប្រាក់តាមម៉ាស៊ីន ATM មិនត្រូវបានអនុញ្ញាតឡើយ។ ការផ្តល់ជូននេះ មិនត្រូវបានរួមបញ្ចូលជាមួយការផ្តល់ជូនផ្សេងទៀតឡើយ។

WESTERN UNION | yes!